# ខ្មែរប៉ុស្តិ៍
THE KHMER POST
ISSUE 45 October 17th - 30th 2009



## ជំហានថ្មីនៃសិល្បៈបូរាណខ្មែរ


សូភីលីន កំពុងបង្ហាត់សិស្ស

**ហ្វីឡាដែលហ្វៀ :** នៅដើមខែតុលា ឆ្នាំ២០០៩ នេះ ក្រុងហ្វីឡាដែលហ្វៀ បានទទួលការបង្ហាញសិល្បៈបូរាណខ្មែរដ៏ត្រចះត្រចង់មួយរបស់ក្រុមសិល្បៈខ្មែរ KHMER ART ដែលមានទីស្នាក់ការនៅឡូងប៊ិច និងនៅតាខ្មៅកម្ពុជា ដឹកនាំដោយនាយិកា " សូភីលីន ឈឹម សាពីរ៉ូ " ចូលរួមដោយ ស្រីលក្ខណ, ចរិយា, សុថារី, និង ថូនី ។

ការបង្ហាញសិល្បៈបូរាណខ្មែរលើកនេះ មានលក្ខណៈពិសេសមួយ គឺក្រៅពីបង្ហាញក្បាច់ និងសំលៀកបំពាក់ដ៏ល្អប្រណិត មានការពន្យល់ពីប្រវត្តិ បកប្រែអត្ថន័យនៃក្បាច់នីមួយៗ យ៉ាងជ្រៅជ្រះពីសិល្បៈការិនី និងពីអ្នកពន្យល់ ធ្វើឱ្យក្បាច់ទាំងឡាយដែលពីមុនមកមានតែដង្ហើម និងព្រលឹង ថ្ងៃនោះនៅហ្វីឡាដែលហ្វៀបន្ថែមដោយភាសា

**តទៅទំព័រទី ០៧**

## តាំងពិពណ៌ផលិតផលនៅឡូគ្នាន់


លោក ម៉ម យឺន និង លោក គីម គៀន កំពុងបង្ហាញក្រុមអ្នកគាំទ្រគ្រួសារខ្មែរ

*ដោយ : ខ្មែរប៉ុស្តិ៍ :*

**ហ្វីឡាដែលហ្វៀ :** ទោះបីជាមេឃមិនសូវបើកថ្ងៃក្តី នៅ. ផ្លូវអូលយ៉ក ប្លុក ៤៩០០ នាថ្ងៃសៅរ៍ ទី ១០ ខែតុលា នេះបានបិទកំណាត់ផ្លូវនៅតំបន់ឡូគ្នាន់ ដើម្បីអនុញ្ញាតិឱ្យសហគមន៍

**តទៅទំព័រទី ១១**

## យុវជនខ្មែរម្នាក់ស្លាប់ដោយចាក់ក

**ហ្វីឡាដែលហ្វៀ :** ម្តាយរបស់យុវជន ភីទ័រ អ៊ួង បាននិយាយប្រាប់ខ្មែរប៉ុស្តិ៍ថា កូនប្រុសរបស់គាត់បានរងគ្រោះរហូតដល់ស្លាប់នៅពេលកំពុងធ្វើការងារខ្លួន កាលពីថ្ងៃទី ២៨ កញ្ញា ឆ្នាំ ២០០៩ ។

ព្រឹត្តិការណ៍បានកើតនៅថ្ងៃសុក្រនោះ ដោយ ភីទ័រ អាយុ២៣ឆ្នាំ ទុកសក់វែងថ្ងៃនោះ "ចងជា "កន្ទុយសេះ "

**តទៅទំព័រទី ០៥**

## ខួបឆ្នាំទីពីរខ្មែរប៉ុស្តិ៍ជួយដល់ក្រុមនិស្សិតក្រីក្រនៅកម្ពុជា

**ក្រុងខ្មែរ, ខ្មែរប៉ុស្តិ៍ : វ៉ានាថ**

•••បងប្អូនខ្មែរ-អាមេរិកាំងភាគខាងត្បូងរដ្ឋ California ប្រមាណជាង300នាក់ បានជួបជុំគ្នានៅក្នុងពិធីខួបកាសែតខ្មែរប៉ុស្តិ៍ 2 ឆ្នាំ កាលពីថ្ងៃទី3 ខែតុលា ឆ្នាំ2009 នៅភោជនីយដ្ឋានឋានសួគ៌ថ្មី បំណងធ្វើការរៃអង្គាសថវិកាជួយគាំទ្រដល់និស្សិតខ្មែរក្រីក្រនៅកម្ពុជាដើម្បីបន្តការសិក្សានៅតាមមហា-វិទ្យាល័យនានាក្នុងខេត្តបាត់ដំបង ។

**តទៅទំព័រទី ១៤**

សូមអញ្ជើញលោកអ្នកអានអត្ថបទជាភាសាអង់គ្លេស នៅទំព័រខាងក្នុង ដែលបានដកស្រង់ចេញពីសារព័ត៌មាន The Cambodia Daily នៅប្រទេសកម្ពុជា ។

# រាត្រីថ្ងៃសៅរ៍ នៅលីបាណុង




•••ក្រោមទឹកភ្លៀងជោគជាំ នារាត្រីសមោសរ ថ្ងៃសៅរ៍ ទី២៦ កញ្ញា របស់សមាគមខ្មែរ នៅលីបាណុង រដ្ឋផែនស៊ីវេនា ។ សហគមន៍ខ្មែរប្រមាណ២០០នាក់ នៅតែមកចូលរួមសម្ដែងការអរសាទររួមគ្នានៅសាលមហោស្រពដ៏ធំទូលាយ ហើយកំសាន្តយ៉ាងរីករាយជាមួយក្រុមតន្ត្រីបាយ័ន - ល្បៀងភោជនាហាជាមួយ ម្ហូបអាហារខ្មែរ ដែលតាំងលក់យ៉ាងគួរឱ្យស្រក់ទឹកមាត់ ។

ឆ្លើយនឹងសំនួរ សុបិន លោក សំបូរ ពេជ ជាប្រធានសមាគម និយាយថា : សមាគមខ្មែរ នៅលីបាណុង នេះមានឈ្មោះថា " Cambodian Community Support Network" ហើយ ពិធីបុណ្យនេះ នឹងប្រមូលកំរៃយកទៅជួយគ្រួសារក្រីក្រនៅកម្ពុជា ។ លោកបន្តថា "បីឆ្នាំកន្លងមក ហើយ លីបាណុង បានផ្ញើប្រាក់ទៅកម្ពុជាតាមសមាគមខ្មែរនៅឡង់កាស្ទ័រ ឈ្មោះ Khmer Hunger តែនៅឆ្នាំនេះ លីបាណុង នឹងទៅចែកអំណោយដោយខ្លួនឯង ។

ក្នុងការផ្សព្វផ្សាយរបស់ពិធីករ វ៉ា ផន លោកបានឆ្លៀតបង្ហាញសមាសភាពរបស់កាសែតខ្មែរប៉ុស្តិ៍ តំណាងដោយ ពិន សំខុន និង សុបិន ថាច់ ជូនដល់ភ្ញៀវដោយកាសែតនេះជាកាសែតខ្មែរតែមួយផ្សព្វផ្សាយព័ត៌មានពីសហគមន៍ខ្មែរ នៅឯបរទេស **តទៅទំព័រទី 13**








# អ្នកស្នេហាជាតិពិតត្រូវតែមានគោលជំហររឹងមាំ

**ដោយ : ម៉ម យីន**



●●●មនុស្សណាមួយដែលអាចក្លាយទៅជាស្តេចក្តីជាប្រធានាធិបតីក្តី ជានាយករដ្ឋមន្ត្រីក្តី ឬជាមន្ត្រីសំខាន់នៅក្នុងប្រទេសជាតិណាមួយបាន លុះត្រាតែមនុស្សនោះ ប្រកាន់យកគោលជំហរជាអ្នកស្នេហាជាតិពិតប្រាកដ មានន័យថា ទោះបីមនុស្សនោះទៅពឹងពាក់មនុស្សដទៃឱ្យជួយយ៉ាងណាក៏ដោយ ក៏ត្រូវតែចងចាំឱ្យបានខ្ជាប់ខ្ជួនបំផុត ចំពោះប្រទេស និងជនជាតិរបស់ខ្លួនជាដាច់ខាត ។

ផ្ទុយទៅវិញ បើសិនជាអ្នកបានក្លាយទៅជាមេដឹកនាំហើយ មនុស្សនោះត្រឡប់ទៅជាប្រគល់ខ្លួនឱ្យទៅនៅក្រោមអំណាចនៃអ្នកដែលបានជួយខ្លួននោះទៅវិញ ដែលគេមានបំណងចង់ត្រួតត្រា ហើយស្រូបទាញយកផលប្រយោជន៍ធំៗ សំខាន់ៗ យកទៅផ្តល់ឱ្យប្រទេស និងជនជាតិរបស់គេ ប្រទេស និងជនជាតិដែលមានមេដឹកនាំរបៀបនេះ មានឈ្មោះថា ជាប្រទេសជាតិគ្មានឯករាជ្យ ជាមេដឹកនាំគ្មានឥស្សរភាព គ្មានឧត្តមភាព គ្មានសិទ្ធិសេរីភាព អំណាចអាណានិគមជាតិដទៃ ជាមេដឹកនាំអាយ៉ង ធ្វើតាមបង្គាប់បញ្ជាសាសន៍ដទៃ រហូតដល់បណ្តាលឱ្យប្រទេសជាតិនោះ ដែលត្រូវបាត់បង់ស្ទើរអស់រលីងនូវអត្តសញ្ញាណនៃពូជសាសន៍របស់ខ្លួន ថែមទាំងបាត់ឈ្មោះប្រទេសចេញពីផែនទីពិភពលោកទៀតផង ។

មានប្រទេសជាតិច្រើនណាស់នៅលើពិភពលោក ដែលកាលពីសម័យដើមបានស្ថិតនៅក្រោមអំណាចអាណានិគមនៃប្រទេសមានអំណាច នៅក្នុងនោះក៏មានប្រទេសខ្មែរមួយដែរ ដែលអាណានិគមនិយមបារាំង ត្រួតត្រានាសតវត្សរ៍ទី ១៩ ហើយបានទទួលឯករាជ្យពេញបរិបូរមកវិញ នាសតវត្សរ៍ទី ២០ មានរយៈពេលប្រមាណជិត ១០០ឆ្នាំ ។

ពាក្យថា " ឯករាជ្យ " មានអត្ថន័យខ្ពង់ខ្ពស់ខ្លាំងណាស់ មិនអាចឱ្យមេដឹកនាំណាមួយបានទទួលមកនៅក្នុងដៃហើយមិនត្រូវឱ្យត្រឡប់ទៅជារបូតចេញទៅវិញ បាត់បង់ពីខ្លួនបានជាដាច់ខាត ។ បើមេដឹកនាំណាដែលគិតថា ត្រូវតែភ័យខ្លាចអស់អំណាច និងខ្លាចសាសន៍ដទៃដែលបានជួយខ្លួន មេដឹកនាំនោះ មានឈ្មោះថាជាមេដឹកនាំអាយ៉ង លក់ខ្លួន ជាមេដឹកនាំទុច្ចរិតឃោឃៅព្រៃផ្សៃ រហូតដល់កាប់សម្លាប់ជាតិសាសន៍របស់ខ្លួនទៀតផង ។ ទង្វើ និងការប្រព្រឹត្តរបៀបនេះ គឺជាមូលហេតុដ៏ធំមួយ ដែលពុំត្រូវបណ្តែតបណ្តោយឱ្យមេដឹកនាំប្រភេទនេះធ្វើ និងប្រព្រឹត្តបន្តទៅមុខទៀតបានទេ ។

មានមេដឹកនាំប្រទេសជាតិមួយចំនួន គេបានប្រកាន់យកគោលជំហរអ្នកស្នេហាជាតិពិតប្រាកដ តាំងពីដើមរហូតមក ទោះបីជាមានពេលខ្លះប្រទេសជាតិ ត្រូវធ្លាក់នៅក្រោមអំណាចអាណានិគមនិយមណាយ៉ាងណាក៏ដោយ ក៏គេខិតខំប្រឹងប្រែង ព្យាយាម ដោយប្តេជ្ញាចិត្តថា " ស៊ូស្លាប់ខ្លួន កុំឱ្យស្លាប់ជាតិ " មានន័យថា បើកាលណាជាតិស្លាប់ហើយ អ្វីៗក៏បាត់សាបសូន្យទាំងអស់ទៅដែរ ពីព្រោះជាតិ គឺជាមនុស្សមានជីវិតមានព្រលឹងវិញ្ញាណ មានសតិស្មារតីមានឧត្តមគតិ និងវិចារណញ្ញាណ រីឯប្រទេស គឺជារបស់ពុំមានជីវិត ពុំមានវិញ្ញាណ ពុំមានសតិស្មារតី មានន័យថា ពុំមានអ្វីៗទាំងអស់ កាលណាធ្លាក់ទៅនៅក្រោមដៃអ្នកណា គឺអ្នកនោះជាម្ចាស់កម្មសិទ្ធិ តួយ៉ាងដូចជា ដែនដីចាមចម្ប៉ា ដែនដីខ្មែរកម្ពុជាក្រោម និងដែនដីខ្មែរនៅក្នុងប្រទេសសៀមសព្វថ្ងៃ ។

ដូច្នេះជាតិសាសន៍ណាមួយ ដែលត្រូវជាតិសាសន៍ដទៃប្រើយុទ្ធសាស្ត្រជាកលល្បិចរៀបចំគម្រោងផែនការ ដើម្បីចងរឹបអូស លេបយកទឹកដីជាតិណាមួយហើយ មេដឹកនាំប្រទេសជាតិនោះ គេព្យាយាមជានិច្ច ដើម្បីបំផ្លាញជាតិសាសន៍នោះឱ្យបាត់បង់ទៅបន្តិចម្តងៗ ឱ្យធ្លាក់ទៅជាខ្សោយគ្រប់វិស័យ បន្ទាប់មកគេបញ្ចូលជាតិគេបន្តិចម្តងៗ ដោយប្រើយុទ្ធវិធីដូចខាងក្រោមនេះ :

**១-** ធ្វើការបំបាក់បំបែកសាមគ្គី ដោយគេយល់ថា ជាតិសាសន៍ដែលមានសាមគ្គីរួបរួមគ្នានៅជុំវិញមេដឹកនាំដ៏មានគោលជំហរស្នេហាជាតិរឹងមាំទៀត ជនជាតិសាសន៍ប្រទេសនោះប្រាកដជាខ្លាំងពូកែ ហើយពុំអាចជាតិសាសន៍ដទៃណាឈ្លានពាន រំលោភ រឹបអូសយកបានឡើយ ។

ដូច្នេះ ដើម្បីយកជ័យជំនះបាន គឺមានតែប្រើគ្រប់កលល្បិចទាំងអស់ ទាំងក្តៅដោយប្រើសង្គ្រាម ទាំងត្រជាក់ដោយយករូបស្រីក្រមុំធ្វើជានុយ និងដោយចិត្តសាស្ត្រមកបញ្ឆោតឱ្យវង្វេងភ្លេចប្រទេសជាតិ ។

**២-** បង្កើតឱ្យមានអង្គការស្ទូល បញ្ចូលបន្លំខ្លួនមកនៅក្នុងគ្រប់ស្ថាប័នជាតិ និងមជ្ឈដ្ឋានប្រជាពលរដ្ឋ ដែលជាអង្គការស្របច្បាប់ នៅចាំជួយការពារ ដោះស្រាយនូវគ្រប់បញ្ហាដែលទាក់ទងនឹងជាតិសាសន៍គេ ឱ្យធ្វើការបំរើជនជាតិម្ចាស់ស្រុកឱ្យល្អប្រពៃជាងជាតិសាសន៍ខ្លួនទៅទៀត ។

**៣-** បង្កើតឱ្យមានសមាគមដែលជាអង្គការប្រមូលផ្តុំជនជាតិគេឱ្យងាយស្រួលក្នុងការជួយឧបត្ថម្ភ ការពារ បង្ហាត់បង្រៀនកុំឱ្យភ្លេចពីទំនៀមទំលាប់ ប្រពៃណី វប្បធម៌ អរិយធម៌ និងសាសនារបស់ខ្លួន ដើម្បីឈានដល់គោលដៅធំ គឺការលេបទឹកដីយ៉ាងស្របច្បាប់ទៅអនាគត ។

**៤-** បង្កើតឱ្យមានទំនាក់ទំនងល្អប្រពៃរវាងគ្រួសារជនម្ចាស់ប្រទេស និងជាតិសាសន៍គេ ដើម្បីឱ្យមានសម្ព័ន្ធភាពខាងគ្រួសារ ដោយពន្យល់ឱ្យកូនក្រមុំជាតិគេ ទៅចងចំណងស្នេហាជាមួយកូនកម្លោះជនម្ចាស់ស្រុក ឬកូនប្រុសកម្លោះគេមកចងស្នេហាជាមួយកូនក្រមុំម្ចាស់ស្រុក ដែលជាវិធីមួយឈានទៅដល់ការបង្កាត់ពូជសាសន៍ រួចហើយក្លាយជាជាតិសាសន៍គេដោយមិនដឹងខ្លួន ។

**៥-**ព្យាយាមប្រើយុទ្ធវិធីជាកលល្បិចទាំងអស់ ដែលជាតិសាសន៍មួយបានបង្កើតឱ្យមានទៅលើសាសន៍មួយទៀតនេះ គេអាចធ្វើបានជោគជ័យជាពិតប្រាកដ ទៅលើប្រទេសដែលស្ថិតនៅជិតខាងគ្នា ដែលមានភិនភាគ ពណ៌សម្បុរស្បែក ភ្នែក សក់ ដូចគ្នា ទំនៀមទំលាប់ប្រពៃណីប្រហាក់ប្រហែលគ្នា ហើយសំគាល់បានថា ខុសគ្នានៅត្រង់តែភាសាប៉ុណ្ណោះ ដូច្នេះជនជាតិនោះ គេបានបង្ហាត់បង្រៀនមុនដំបូងឱ្យចេះនិយាយភាសាម្ចាស់ស្រុក បន្ទាប់មកគេបញ្ចូលភាសាគេឱ្យរៀនដែរ ដើម្បីឱ្យងាយស្រួលទាក់ទងគ្នា នៅក្នុងកិច្ចការសំខាន់ៗ រហូតដល់ភូមិស្រុកខ្លះ ដែលមានជនជាតិគេរស់នៅច្រើនគេប្រើប្រាស់ និងនិយាយភាសាគេតែម្តង ។

យុទ្ធវិធីទាំង ៥ ចំណុចខាងក្រោមនេះ គឺគ្រាន់តែបញ្ជាក់បង្ហាញពីគោលបំណងធំៗមួយចំនួន ដែលប្រទេសជិតខាងគ្នាមួយ ចង់ពង្រីកទឹកដីខ្លួន ទៅលើប្រទេសជាតិមួយទៀតតែប៉ុណ្ណោះ តាមការពិតនៅមានយុទ្ធវិធីដទៃច្រើនទៀត ដែលគេមានគម្រោងរៀបចំ ដូចជាការបញ្ចូលមន្ត្រីគ្រប់ជាន់ថ្នាក់ឱ្យទៅដឹកនាំកិច្ចការនយោបាយគ្រប់ស្ថាប័ន **តទៅទំព័រទី ១៨**

The Khmer Post Directory
East Coast Publication
Regional Editor : Pin Samkhon
Email : pinsamkhon@gmail.com
Writers : Mam Yin
Kim Phean
Im Loeurm
Bopea Chum
Advertising
Marketing Manager:
Sabane Thach
Phone : 267-253-3947
Email : sabane.thach@gmail.com
West Coast Publication
RegionalEditor : Sovannara Meach
Writers : Kim Saroeurn
Ra Neat
Sophea Rith
Mey Sampos
Chan Kosal
Sovann Rith
Phone: (562) 313-2129
Email: sovannara04@yahoo.com




# ទ្រង់ទ្រាយនៃសម្ព័ន្ធភាពរបស់បក្សប្រឆាំង


លោក ពិន សំខុន

***ដោយ : ពិន សំខុន***

***តពីលេខមុន***

● មានមធ្យោបាយច្រើន ដែលបក្សប្រឆាំងអាចរួបរួមគ្នាយកជ័យជំនះលើបក្សកាន់អំណាចសព្វថ្ងៃបាន តែដើម្បីរក្សាជ័យជំនះនោះឱ្យនៅគង់វង្ស ស្ថិតស្ថេរបាន គឺមានតែមួយ គឺប្រកាន់សុច្ចរិត យុត្តិធម៌ ជាមាគ៌ាឱ្យខ្ជាប់ខ្ជួន ពីព្រោះដើម្បីឈ្នះ គេមិនអាចចងសម្ព័ន្ធភាពជាមួយនឹងបក្សណាដែលទុច្ចរិតនោះទេ ។

**៩- មូលដ្ឋាននៃសម្ព័ន្ធភាព :** គណបក្ស សម រង្ស៊ី និងគណបក្សសិទ្ធិមនុស្ស បានប្តេជ្ញាចិត្តតែរៀងៗខ្លួន ចុះហត្ថលេខាជាភស្តុតាងថា នឹងចងសម្ព័ន្ធភាព ដើម្បីផ្លាស់ប្តូរឱ្យទាល់តែបាន តែពុំដឹងជានៅពេលណាទើបសម្ព័ន្ធភាពនឹងអាចកើតមានឡើងបាននោះទេ ពេលវេលាគឺជាលក្ខខណ្ឌដ៏សំខាន់មួយរបស់បក្ស សម រង្ស៊ី ដែលនៅរារែកខ្លាចក្រែងគណបក្សសិទ្ធិមនុស្សមកកេងយកចំណេញអ្វីពីខ្លួន រីឯគណបក្សសិទ្ធិមនុស្ស បានបង្ហាញថា ខ្លួនបានត្រៀមខ្លួនជាស្រេចសម្រាប់រំលាយខ្លួននោះរួចហើយ ហាក់បីដូចជាប្រាកដក្នុងចិត្តថា បើរំលាយចូលគ្នាហើយ ខ្លួនក៏នៅការពារខ្លួនបាន ទោះជាមានអាសន្នអ្វីមកដល់ក៏ដោយ ។ បើទោះជាទាំងសងខាងយល់ថាម្នាក់ទៀត គឺជាបេក្ខជនដ៏ប្រសើរបំផុតសម្រាប់សម្ព័ន្ធភាពរបស់ខ្លួន ក៏នៅពេលនោះ ភាពផុយស្រួយឆាប់ថ្លោះធ្លោយអាចនឹងកើតឡើងបាននៅឡើយ ដោយគណបក្សដែលកាន់អំណាចមានមធ្យោបាយសន្ធឹកសន្ធាប់សម្រាប់បំបែកសម្ព័ន្ធភាព រីឯសាមុីខ្លួនក៏ពុំទាន់រឹងប៉ឹង និងស្មារតីសាមគ្គីគ្មានរបៀបណានៅឡើយដែរ ។ ភាពផុយស្រួយមួយទៀត គឺការពង្រឹងស្មារតី សុច្ចរិត និងយុត្តិធម៌ ដែលជាប្រភពដ៏រឹងមាំនៃការអភិវឌ្ឍន៍ទូទៅ ពុំទាន់បានក្លាយជាមូលដ្ឋាននៃការអប់រំពលរដ្ឋ អប់រំស្មុល និងអប់រំបក្ស ដែលជាបុព្វហេតុចម្បងនៃការសម្រេចចិត្តមិនច្បាស់លាស់ ពុំអាចផ្លាស់ប្តូររកសាមគ្គីឱ្យពិតប្រាកដបាន ។ ដូច្នេះការស្វែងរកសម្លេងច្រើនរបស់លទ្ធិប្រជាធិបតេយ្យ ដែលគណបក្សសិទ្ធិមនុស្សទាមទារគឺត្រូវមានមូលដ្ឋាននៅលើភាពសុច្ចរិត និងយុត្តិធម៌ បើគ្មានទេ គេត្រូវហ៊ានទាត់ចោលជាគោលការណ៍ដូចគ្នា ឧទាហរណ៍ គេពុំអាចសាមគ្គីជាមួយជនដែលគ្រាន់តែមានលុយច្រើន គ្រាន់តែមានតួនាទីដ៏មានឈ្មោះល្បី គ្រាន់តែបានកើតក្នុងត្រកូលក្សត្រ... ។ល។ តែប៉ុណ្ណោះទេ ។

**១០-លក្ខខណ្ឌពេលវេលាសម្រាប់ធ្វើសម្ព័ន្ធភាព :**

ការជ្រើសរើសយកឱកាសបោះឆ្នោតលើកក្រោយជាពេលសម្រាប់បង្កើត " សម្ព័ន្ធភាពអ្នកប្រជាធិបតេយ្យ ដើម្បីផ្លាស់ប្តូរ " ដូចដែលគណបក្ស សម រង្ស៊ី បានថ្លែងការណ៍នោះ នៅជាស្រមោលនៅឡើយ ហើយគេអាចយល់ចិត្តសមាជិកគណបក្សសិទ្ធិមនុស្សជាច្រើន ដែលមានមន្ទិលសង្ស័យថា សម្ព័ន្ធភាពនេះ ពុំអាចកើតឡើងបាន ។ អ្នកនយោបាយជើងចាស់មានការប្រុងប្រយ័ត្នខ្ពស់ មិនងាយទៅហក់នឹងអំណោយផលល្អ ដែលធ្លាក់មកស្រួលៗ ពេលនោះទេ តែងតែទុកឱកាសដើម្បីមើលឱ្យគ្រប់ជ្រុងជ្រោយនៃរបត់នយោបាយ ហើយបើពេលបោះឆ្នោតខាងមុខមកដល់ ក៏មិនច្បាស់ថាលក្ខខណ្ឌជាមូលដ្ឋានមួយចំនួន ដែលខ្លួនចង់បានប្រាកដជាមកដល់ទេ តើគណបក្សសិទ្ធិមនុស្សដ៏ក្មេងខ្ចីនឹងបង្ហាញភាពរឹងប៉ឹងរបស់ខ្លួនប៉ុណ្ណា ឬក៏បែរជាជ្រាយវិញទៅបាន ? តើការប្រុងប្រៀបបំផ្លាញកម្លាំងសម្ព័ន្ធភាពនឹងកើតមានរបៀបណា ? តើគណបក្សទាំងពីរផ្គួបគ្នាបានហើយឬនៅ ? ដូច្នេះ ការកំណត់ពេលបោះឆ្នោតឆ្នាំ ២០១២ គ្រាន់តែដំណាក់កាលមួយសម្រាប់ធ្វើតុល្យភាពតែប៉ុណ្ណោះ សម្ព័ន្ធភាពពុំច្បាស់ជាកើតបាននៅឡើងទេ ។

**១១- សម្ព័ន្ធភាពរូបភាពគណបក្សតែមួយ**

គណបក្សសិទ្ធិមនុស្សចង់បានការរួបរួមបញ្ចូលគណបក្សទាំងពីរឱ្យទៅជាមួយវិញ គណបក្ស សម រង្ស៊ី ពុំទាន់មានអារម្មណ៍នោះនៅឡើយទេ តែក៏មិនប្រឆាំងនឹងគំនិតនេះដែរ ពីព្រោះតែទស្សនៈ " កម្លាំងប្រឆាំងដ៏ខ្លាំងក្លាទាំងពីររួមគ្នា " កំពុងតែមានប្រជាប្រិយណាស់ នរណាប្រឆាំងដូចគ្នានឹងហែលទឹកបញ្ច្រាសចរន្តដូច្នេះដែរ ។ យ៉ាងណាក៏ដោយសម្ព័ន្ធភាពក្នុងរូបភាពបក្សពីររំលាយខ្លួនឱ្យទៅជាបក្សតែមួយ ជាការបរិច្ចាគចំពោះជាតិដ៏ខ្ពង់ខ្ពស់បំផុត ពុំងាយនឹងធ្វើបានទេ ជាពិសេសចំពោះគណបក្ស សម រង្ស៊ី តាំងពីដំបូងមកប្រើរូបមន្តទាក់ទាញអ្នកដទៃឱ្យមកចូលខ្លួន ហើយពុំដែលនឹកថា នឹងរំលាយខ្លួននៅថ្ងៃណាមួយឡើយ តាំងតែពីជិត ១៥ឆ្នាំមកហើយ - ផ្ទុយគ្នានឹងគណបក្សសិទ្ធិមនុស្ស ដែលតាំងពីដំបូងទី ត្រៀមធ្វើសម្បទានឱ្យគណបក្ស សម រង្ស៊ី ឱ្យតែបានកើតជាសម្ព័ន្ធភាពនេះឡើង ទោះជាពុំទាន់ដឹងថា តើនឹងគ្រប់គ្រងជាមួយគណបក្ស សម រង្ស៊ី បានដោយរបៀបណាក៏ដោយក្តី ។ ប្រសិនបើការបាត់បង់ឈ្មោះដើមរបស់ខ្លួន ពុំបានធ្វើឱ្យម្នាក់ៗសោកស្តាយទេនោះ គេនឹងឃើញទស្សនៈថ្មីនៃការគ្រប់គ្រងតាមរបៀបប្រជាធិបតេយ្យដ៏ស្មោះសមួយនឹងកើតឡើង ដែលសមាជិកបក្សទាំងពីររួមគ្នា របបប្រជាធិបតេយ្យនឹងទទួលផលបុណ្យពីការលះបង់នោះភ្លាម ។ ផលបុណ្យនោះ គឺទស្សនៈបំរើជាតិមុនបក្សទស្សនៈបំរើឧត្តមគតិមុនបុគ្គល - ទស្សនៈយុត្តិធម៌ និងសុច្ចរិតមុនប្រយោជន៍ផ្ទាល់ខ្លួន និងអញ្ញនិយម នេះប្រាកដជាឋាមពលថ្មីដ៏ខ្លាំងក្លាមួយ ដែលប្រមូលកម្លាំងពលរដ្ឋបាន ព្រោះពួកគាត់នឹងដឹងថា មានការធានាជាក់ច្បាស់មួយសម្រាប់យឹតយោង និងការពារប្រជាជាតិបាន ។ ចំណែកឯពិភពប្រទេសអ្នកប្រជាធិបតេយ្យអាចនឹងមើលឃើញ ហើយធានាថា គេចូលមកជួយមិនខកចិត្តដូចឆ្នាំ ១៩៩៣ នោះទេ ។ ពេលនោះលោក កឹម សុខា ដែលសុខចិត្តបរិច្ចាគតំណែងប្រធានឱ្យទៅលោក សម រង្ស៊ី ហើយទុកតំណែងអនុប្រធានឱ្យទៅគណបក្សសិទ្ធិមនុស្សពុំច្បាស់ជាធានាថា ការបោះឆ្នោតផ្ទៃក្នុងនឹងទទួលលទ្ធផលដូចបំណងនោះទេ ពីព្រោះការបោះឆ្នោះនឹងមានន័យថា " ជ្រើសរើសរកមនុស្សប្រសើរបំផុត ប្រជាប្រិយបំផុត " ដែលក្នុងនោះបុគ្គលតែងតែផ្លាស់ប្តូរជានិច្ច - ហើយទស្សនៈនេះនឹងប្តូរការដឹកនាំផ្ទៃក្នុងនៅក្នុងក្រុង-ស្រុក-ភូមិទាំងមូល មុននឹងឈានទៅដល់ការប្តូរការគ្រប់គ្រងប្រជាជាតិកម្ពុជា ។ នៅឆ្នាំ ២០១២ តើលក្ខខណ្ឌរំលាយខ្លួនរបស់បក្ស សម រង្ស៊ី មកដល់ហើយឬនៅ ? នេះជាការសង្ស័យថា ការរំលាយឱ្យទៅជាបក្សតែមួយមិនអាចធ្វើទៅបាននៅឡើយទេ ។

**១២- សម្ព័ន្ធភាពក្នុងរូបភាពបក្សពីរ :**

ថ្វីបើមិនទាន់អាចរំលាយចូលគ្នាបានក៏ដោយ ក៏គេអាចសង្ឃឹមថានឹងកើតមានសម្ព័ន្ធភាពនៃបក្សពីរ ដើម្បីចូលរួមសម្រាប់តែពេលបោះឆ្នោតសាកលខាងមុខបានដែរ ។ តែនេះបង្ហាញថា ពុំទាន់ទុកចិត្តគ្នាយ៉ាងស្មោះស្ម័គ្រនៅឡើយទេ រវាងបក្សនយោបាយទាំងពីរនេះ ។ គេឃើញមានគំរូនេះ នៅប្រទេសប្រជាធិបតេយ្យជាច្រើនដែរ ដែលគណបក្សទាំងពីរ នឹងចរចាគ្នា ដើម្បីគ្រប់គ្រងប្រទេសនៅក្នុងសភាទាំងពីរ គ្រប់គ្រងនយោបាយ បើត្រូវកាន់កាប់រដ្ឋាភិបាល គេនឹងឃើញមានការបែងចែកភូមិភាគ យកជ័យជំនះនៅតាមតំបន់ - នឹងឃើញការចរចាដាក់បេក្ខជនខ្លាំងៗ របស់បក្សនីមួយៗ ដើម្បីឱ្យបានតំណាងរាស្ត្រចំនួនឱ្យច្រើនបំផុត តែទាំងនោះធ្វើឡើងក្នុងក្របខណ្ឌនៃការ "ចរចាទុកចិត្តលើភាពស្មោះត្រង់រវាងបក្សទាំងស្រុង ដែលជារូបភាពខុសគ្នាពីបក្ស " ពីររលាយចូលគ្នា ។ មើលលទ្ធិប្រជាធិបតេយ្យក្នុងរូបភាព "សម្ព័ន្ធភាពមួយ គណបក្សពីរ " អាចនឹងធ្វើទៅទទួលលទ្ធផលជាសន្លឹកឆ្នោតជាចំនួនអាសនៈបានច្រើនដូចរូបភាព " សម្ព័ន្ធមួយគណបក្សមួយ " ដែរ តែនៅក្នុងនោះ ទស្សនៈ " សិទ្ធិជាពលរដ្ឋម្នាក់ៗ " ពុំបានពេញលេញដូចអត្ថន័យនៃរដ្ឋធម្មនុញ្ញទេ ពីព្រោះពលរដ្ឋក្នុងបក្សពុំបានជ្រើសរើសតំណាងរបស់ខ្លួន តាំងពីដំណាក់កាលដំបូងដោយសេរីនោះទេ ។ **តទៅទំព័រទី ១៧**



# ជីវិតយុវជនរត់ចោលសាលារៀន

## YOUTH´S LIFE DROPPED H.S.

**ដោយ ម៉ម យ៉ឺន**

ឱយុវជនអើយ ម្តេចអភ័ព្វ មិនគួរអ្នកឈប់មិនបន្ត
សិក្សារៀនសូត្រឱ្យបានល្អ ចិត្តសែនត្រេកអរ ព្រោះរៀនចប់ ។
យុវជនយល់ខុស ព្រោះគិតខ្លី ជឿតាមសំដីមិត្តបានប្រាប់
ពន្យល់ឱ្យចេះការខុសច្បាប់ មិនបានត្រង់ត្រាប់តាមម៉ែឪ ។
ម៉ែឪស្រឡាញ់កូនខ្លាំងណាស់ បានប្រៀនកូនច្បាស់ប្រាប់ប្រដៅ
ឱ្យកូនប្រុសស្រីគិតត្រឹមត្រូវ ខំសិក្សាទៅទើបថ្លាថ្លៃ ។
វិជ្ជាជាទ្រព្យល្អវិសេស អ្នកមានចំណេះទើបប្រពៃ
ជាមនុស្សឧត្តមសក្តិសមក្រៃ ដូចពេជ្រចរណៃតម្លៃខ្ពស់ ។
មិនគួរយុវជនចិត្តរាយមាយ រត់ចោលគ្មានស្តាយសាលាសោះ
សាលានេះហើយជួយសង្គ្រោះ ឱ្យយុវជនរស់មានតម្លៃ ។
យុវជនរៀនចប់បានសម្រេច លទ្ធិផលល្អផ្តាច់ជាជោគជ័យ
ទៅអនាគតជីវិតប្រពៃ ទទួលកំរៃពីការងារ ។
យុវជនរៀនចប់ពិតថ្លៃថ្លា ឱ្យមានរស្មីក្នុងគ្រួសារ
បងប្អូនញាតិមិត្តគ្រប់ៗគ្នា ចិត្តស្និទស្នេហាឱ្យពរជ័យ ។
ពិសេសឪម៉ែតែងស្រឡាញ់ ដោយចិត្តពោរពេញរៀងរាល់ថ្ងៃ
ឃើញកូនសំឡាញ់ទាំងប្រុសស្រី រៀនចប់បានជ័យសែនត្រេកអរ ។
ឱសែនអាណិតដល់យុវជន មិនគួរចិត្តភន់មិនបន្ត
រត់ចោលសាលាទៅត្រដរ ចាប់យកជំហរជាជនពាល ។
ដើរលេងសប្បាយស្រាស្រីល្បែង ធ្វើចិត្តអ្នកលេងការស្រើបស្រាល
ផឹកស៊ីវក់វីជក់វាលដាល នាំចិត្តបណ្តាលទៅអាក្រក់ ។
ចេះលួចចេះប្លន់ចេះបោកប្រាស់ ចេះហ៊ានព្រលះចេះដើរឆក់
ចេះបាញ់ចេះចាក់ចេះវៃតក់ ចេះភួតកុហក់ចេះជាប់គុក ។
យុវជនអភ័ព្វត្រូវជាប់ឃុំ ម៉ែឪតែងយំ តែងកើតទុក្ខ
នឹកឃើញសែនខ្មាស់ពួនលាក់មុខ ខ្ជះរត់ចោលស្រុកព្រោះសោកស្តាយ ។
គួរណាស់យុវជនបានធ្វើខុស យល់ពីកំហុសព្រមដាក់កាយ
ដាក់ចិត្តមកស្តាប់ឪពុកម្តាយ គាត់ខំដោះស្រាយឱ្យកូនល្អ ។
យុវជនធ្វើខុសទាំងឡាយអើយ ចូរអ្នកបែរក្រោយមកបន្ត
ចូលសាលាវិញដោយស្មោះស ទើបអ្នកបានពរពីឪម៉ែ ។
ហើយអ្នកតាំងចិត្តខំរៀនសូត្រ ប្រឹងរៀនរហូតលុះត្រាតែ
បានជាប់បានជាសិស្សពូកែ បានក្លាយបានប្រែកូនល្អពិត ។
ជាកូនឧត្តមពេញលក្ខណា កូនមានវាសនាមានជីវិត
អនាគតល្អពេញគំរិត ម៉ែឪញាតិមិត្តស្នេហ៍ស្និទអើយ ៕

## នាទីកំសាន្តពីមិត្តអ្នកអាន : ខ្សាច់ពណ៌មាស

**ដោយ : ខុសុម អុង**



•••ជាយូរឆ្នាំកន្លងមកហើយបុរសសាសុគី ជនជាតិជប៉ុនជាអ្នកនេសាទត្រីមានកូនសំពៅមួយជាអ្នកក្រីក្រម្នាក់ សាសុគីធ្វើជាបុរសឆ្កួត លីលា គ្មាននរណាជួយគាត់ឱ្យធ្វើការទេ ។ បុរសតែងតែសួររកការងារធ្វើជារឿយៗទីបំផុត បំណងគេបានសំរេចមែន ។ ឧត្តមសេនីយ៍ម្នាក់បានសួរឱ្យមិត្តភក្តិគាត់ឱ្យការងារខាងដាំស្លទៅបុរសសាសុគី ។ រឿងការងារនេះគេអាចធ្វើបាន សាសុគី នៅពេលព្រឹកព្រលឹមអាចចំអិនបាយរៀបចំ មិសូស៊ុប គ្មាននរណាអាចធ្វើបានទេ មានតែគេម្នាក់គត់ ។ គេសប្បាយនឹងកិច្ចការនេះ ពេលគេលើកបាយជូនវែកប្រើសង្រែកសែងបាយបុរសដ៏ទៃសើនចំអកឱ្យរាល់ដង តែ សាសុគី រអ៊ូថា " ម្ហូបទាំងអស់ជាចំណីពីឋានសួគ៌ " អញ្ចឹងបានជានៅពេលសេសសល់គាត់ផ្តល់ឱ្យសត្វស៊ីឥតដែលខាន ។ គាត់ជឿថា សត្វត្រីជាចំណីឱ្យសត្វលោកបានរស់អញ្ចឹងចំណីផ្តល់ឱ្យវាមានប្រយោជន៏ណាស់ ។ ពេលបានចំណីសត្វគេបានហៅ " ត្រីឯងមកទទួលចំណីពីយើងចុះកុំខ្លាចអី " ពេលដំបូងមានត្រីតិចតួចពីរបីប៉ុណ្ណោះ ដែលមកស៊ីចំណីគាត់ ។ ស្រាប់តែក្រោយមកត្រីរាប់រយបានហែលមកក្បែរសំពៅត្រីពួកហ្នឹងហាក់ដូចជឿថា " ពេលមានភ្លៀងខ្លាំងដូចពេលយប់នោះ គ្មាននរណាមកទេមានតែមនុស្សឆ្កួតឥតដឹងអី ទើបបានមកពេលភ្លៀង" ។

៣ ថ្ងៃកន្លងសំពៅ សាសុគី បានចេញស្វែងរកត្រីធំៗ គេបានបើកសំពៅ ៣ថ្ងៃ៣យប់ ទៅកន្លែងដែលគេមិនទាន់បានទៅពីមុនសោះ ។ ពេលយប់មួយ គេកោសឆ្នាំងយកចំណីដែលសល់បោះទៅលើផ្ទៃជលសា ហើយគេបានពោលថា " ថ្ងៃស្អែកយើងសុំឯងស៊ីទៀត " ។

យប់បន្ទាប់គេឱ្យត្រីស៊ីទៀត រួចមកគេងុយគេក៏លង់លក់ទៅ ស្រាប់តែភ្ញាក់ឡើងឮសម្លេងប្លែក ហើយសំពៅឥតយោងទៀតដូចមុនទេ ។ នេះជាការពិតនៅកណ្តាលសមុទ្រសោះស្រាប់តែសំពៅបានទៅដល់គោក គួរឱ្យខ្លាច សាសុគីបានឡើងខាងក្រោយសំពៅ គាត់រកមើលសម្លេងប្លែក ហើយគាត់លាន់មាត់ថា ទឹកសមុទ្រ ! **ទៅទំព័រទី ១៦**



**(តមកពីទំព័រទី ០១)** ## យុវជនខ្មែរម្នាក់ស្លាប់ដោយ...

ត្រូវបានម៉ាស៊ីនគាបសក់ជាប់ ហើយទាញក្បាលចូលក្នុងម៉ាស៊ីនរហូតបណ្តាលឱ្យមានគ្រោះថ្នាក់បាក់ក នៅរោងចក្រមួយ នៅ " ម៉ង់ត្គោមេរីថៅនស៊ីប " ។ កាសែត "គូរីយេថាម " ដកស្រង់សំដីវិជ្ជបណ្ឌិតថា "ភីទ័រ ស្លាក់ដោយបាក់ក ក្នុងគ្រោះថ្នាក់ឧស្សាហកម្មមួយដ៏គួរឱ្យសោកស្តាយបំផុត " ។ យើងពុំទាន់ដឹងថា ការស៊ើបអង្កេតរបស់អ្នកជំនាញការឯករាជ្យធ្វើទៅរបៀបណានៅឡើយទេ តែអ្នកទទួលខុសត្រូវរោងចក្រនោះនិយាយថា " នេះជាគ្រោះថ្នាក់ដល់ជីវិតលើកដំបូងបង្អស់ដែលមិនដែលមានក្នុងរោងចក្រតាំងពី៤៨ឆ្នាំមកហើយ " ។

ម្តាយរបស់ ភីទ័រ ម្ចាស់ហាងផ្កាយព្រឹក ផ្លូវអូលយ៉ក និយាយទាំងទឹកភ្នែកថា " កូនប្រុសគាត់ជាមនុស្សល្អ ឧស្សាហ៍ធ្វើការ ខ្ញុំមានការស្តាយខ្លាំងណាស់" ។ កាសែតបានបញ្ជាក់ថា ភីទ័រ អួង បានធ្វើការនៅក្នុងរោងចក្រដដែលនោះចំនួន១០ខែហើយ ។

បុណ្យ ១០០ថ្ងៃនឹងធ្វើនៅទី ២៦ ខែកុម្ភៈ ឆ្នាំ ២០១០ ហើយគ្រួសារសពអាចទាក់ទងបាននៅលេខ (267) 570-9483 ៕




- មែនឬបង ?

- បងជាទាហាន ! បងមិនដែលនិយាយកុហកអ្នកណាម្នាក់ទេ ! តែបងប្លែកពីឯងត្រង់មិនចេះនិយាយពាក្យផ្អែមល្ហែមដូចឯងសោះ។ ត្រូវមិនត្រូវ គឺផ្ទុង ! មួយកណ្តាប់ដៃត្រង់សៀតផ្កា ឬក្តាំងមួយគ្រាប់ចំកណ្តាលក្បាលចំពោះសត្រូវឈ្លានពានទឹកដីយើង ។ ឯងយល់ច្បាស់ពីបងហើយ ! ។ ឯរឿងសម្ងាត់ដែលបងបានបញ្ចេញឱ្យឯងពីអនាគតឪពុកក្មេកឯង ចូរឯងដឹងតែម្នាក់ឯងបានហើយ ទោះបីអ្នកគ្រូ នៅឯអង្គតាសោម ក៏កុំឱ្យដឹងដែរ ។ ព្រោះនេះជាកិត្តិយសរបស់បង ដែលជាអ្នករក្សាការសម្ងាត់របស់ចៅហ្វាយ តែដោយសារអាប្អូនឯង បងទម្លាយការសម្ងាត់នេះ ។

សម្លឹងមុខបងធម៌ខ្លួនដោយក្តីស្រឡាញ់និងទុកចិត្ត : បងមិនបាច់ព្រួយរឿងនេះទេ ទុកចិត្តប្អូនប្រុសបងចុះ មិនមានអ្នកទីបីណាដឹងរឿងនេះទេ ទោះបីអ្នកគ្រូ ក៏មិនត្រូវបានដឹងរឿងនេះដែរ!។ អើបើបានអញ្ចឹងទើបល្អ យ៉ាងណឹងទើបសមជាអាប្អូនប្រុសរបស់អាអ៊ុំសារ៉ុណបងប្រុសឯង! ។

កំពុងតែសប្បាយដោយបានជួបគ្នាដោយចៃដន្យនេះ អ្នកទាំងពីរភ្លេចអស់បរិយាកាសជុំវិញខ្លួន ស្រាប់តែនឹកឃើញរឿងលោកស័ក្តិ៥ ណៃខុន ចងមនុស្សទោសឱ្យគេពន្លាស់សាច់ ដើម្បីសងសឹកនឹងអំពើឃោឃៅរបស់ពួកខ្មែរក្រហមនិងពួកកុម្មុយនិស្តយួនខាងជើង បានចាប់ទាហានខាងសាធារណរដ្ឋ ឬប្រជាជនសាមញ្ញសង្ស័យថាជាអ្នកខាង លន់ នល់ យកទៅសម្លាប់ដោយអារកនឹងធាងត្នោត ។ សម្លឹងបងធម៌របស់ខ្លួនដូចចង់សុំអ្វីម្យ៉ាង លោកអ៊ុំ សារ៉ុណ ក៏សួរភ្លាម :

- ឯងមានរឿងអីចង់សួរឬ? ។ បានឱកាសវិរៈ ក៏សួរភ្លាម : " លោកបង ! ខ្ញុំចង់សុំឱ្យបងជួយដោះស្រាយចំណោទមួយ ខ្ញុំយល់ថាបងដោះស្រាយបានដោយងាយបំផុត! ។ គាត់ហាក់ដូចបារម្ភក្រែងប្អូនធម៌គាត់មានរឿងអីមិនស្រួល " ឯងមានរឿងអីមិនស្រួលឬ? " ។

- អត់ទេលោកបង ! ខ្ញុំមិនដែលមានរឿងអីអាក្រក់ទេ សុំបងកុំព្រួយ រឿងនេះវាអញ្ចេះទេ គឺលោកកុម្មង់ដង់ស៊ុប (Mr. le commandant superieur) ណៃខុនជាមេបញ្ជាការ នៅតាំងគោកនេះ គាត់ថែមទាំងជាចៅហ្វាយស្រុកទៀតផង ។ លើកមុនពួកខ្មាំងចូលមកវាយលុកបន្ទាយកងល្បាតយើងចាប់បានទាហានយួនម្នាក់ចូលមកដល់ក្នុងបន្ទាយតែត្រូវយើងវាយសន្ធាប់ខ្លាំងពេក វាវង្វេងរកផ្លូវចេញទៅមិនរួច ក៏ត្រូវពួកយើងចាប់បាន លោកណៃខុន យកមកចងចង់ឱ្យគេពន្លាស់សាច់ម្តងរួចមកហើយ តែខ្ញុំខំតស៊ូយោបល់ខ្លាំងពេកគាត់ក៏សុខចិត្តបញ្ជូនទៅថ្នាក់លើកាត់ទោសបាត់ទៅ តែគាត់មិនសប្បាយចិត្តនឹងខ្ញុំរហូតមក ហើយគាត់មានគំនិតថា ខ្ញុំស្រឡាញ់យួន កាន់ជើងយួនទៀតផង។ ម្តងនេះ ចាប់បានខ្មែរក្រហមម្នាក់លួចលួនចូលកាត់របងលួសបន្លាក្នុងបំណងចូលមកបោកគ្រាប់បែកក្នុងបន្ទាយធ្វើឱ្យចលាចលក្នុងបន្ទាយទាំងមូល ពួកវាប្រើពាក្យយួនហៅថាពួក "ដាក់កុង"។ ពួកល្បាតយើងទើបចាប់វាបានយប់មិញនេះ ។ ព្រឹកឡើងលោកកុម្មង់ដង់ស៊ុប យកវាមកចងនឹងបង្គោលទង់ជាតិវិទ្យាល័យតាំងគោកនេះទៀត ក្នុងបំណងឱ្យប្រជាជនចូលមកពន្លាស់សាច់វាជាល្បែងសងសឹកនៅម៉ោង១២ថ្ងៃត្រង់នេះ។ ខ្ញុំគិតថាទៅជួបគាត់ សុំគាត់កុំឱ្យធ្វើយ៉ាងណឹង សុំឱ្យគាត់ធ្វើរបាយការណ៍បញ្ជូនទៅថ្នាក់លើទៀតទៅ ។ លោក អ៊ុំ សារ៉ុណ សម្លឹងមុខប្អូនធម៌របស់ខ្លួនដោយងឿងឆ្ងល់ :

- ម៉េចអាប្អូនឯងចូលចិត្តប្រឆាំងនឹងគាត់? ។ វិរៈ សម្លឹងមុខបងធម៌ខ្លួនវិញដោយមន្ទិលសង្ស័យ :

- លោកបងគាំទ្រយោបល់លោក វរសេនីយ៍ ណៃខុនដែរឬ? ។ លោកអ៊ុំ សារ៉ុណ សម្លឹងក្រឡេតចំភ្នែកទាំងពីររបស់វិរៈធ្វើឱ្យកម្លោះស្ទើរតែញ័រមាត់និយាយតទៅទៀតមិនចេញ ។ ឃើញដូច្នោះលោកអ៊ុំ សារ៉ុណ បន្ត :

- ពេលបងសួរត្រូវឆ្លើយឱ្យចប់សិន រួចចង់សួរបងរឿងអីចាំសួរក្រោយស្តាប់បានទេ ? វិរៈគិតក្នុងចិត្តថា បងធម៌របស់ខ្លួនមិនមែនជាមនុស្សងាយស្រួលប៉ុន្មានដែរទេ គាត់ជាទាហានពិតប្រាកដ ចិត្តគាត់មិនមែនងាយស្រួលអ្វីប៉ុន្មានទេ ខុសពីចិត្តរបស់ខ្លួនស្រឡះ ។

( នៅមានតទៅលេខក្រោយ )

# ស្វែងរកការរំដោះតាមមាគ៌ារបស់ព្រះពុទ្ធ

ដោយ : សុបិន

*ពីតិចសាស់ :*

●●●រៀបការបានបីថ្ងៃ នៅដើមខែកញ្ញានេះ ខ្ញុំចេញដំណើរតាមយន្តហោះពីហ្វីឡាដែលហៀរនេះសំដៅទៅតិចសាស់ជាមួយប្តីខ្ញុំ នៅទីនោះមានមជ្ឈមណ្ឌលមួយស្ថិតនៅប្រមាណជា ៥០ ម៉ាយល៍ ខាងត្បូងក្រុង ដាឡាស ទីដែលជាជនបទតូចមួយ ដែលមានផ្ទះកសិករមួយៗសង់ដាច់ឆ្ងាយពីគ្នាលើស្រែចម្ការធំធ្វើឱ្យមជ្ឈមណ្ឌលមួយដ៏ធំទូលាយ ដោយទីធ្លាធំ និងអគារតូចជាច្រើនបានក្លាយទៅជាទីរហោដ្ឋានស្ងាត់ជ្រងុំសម្រាប់ធ្វើជាជម្រកស្វែងរកសេចក្តីស្ងប់ ។ មជ្ឈមណ្ឌលនោះមានឈ្មោះថា "ធម្មាសេរី" ដែលប្រាក់កាសរបស់សប្បុរសជនជាច្រើនត្រូវបានយកមកធ្វើជាសំណង់ក្នុងគំនិតជាវត្តអារាម ដើម្បីអនុញ្ញាតឱ្យសាធារណៈជនអាចទទួលនូវព្រះធម៌របស់ព្រះពុទ្ធសមណគោត្តមក្នុងសមាធិកម្មដ្ឋានវិប្បសនា ដែលប្រព្រឹត្តិទៅច្រើនថ្ងៃដែលក្នុងរយៈពេលនោះ មនុស្សទាំងអស់ត្រូវបានទទួលនូវការគោរពវិន័យជាអ្នកបួសពេញរយៈពេលដែលសំណាក់ទីនោះ។

ខ្ញុំត្រូវចូលរួមក្នុងកម្មវិធីវិប្បសនាកម្មដ្ឋាននេះចំនួន ១០ ថ្ងៃ ចាប់តាំងពីថ្ងៃទី ១ ខ្ញុំត្រូវទៅនៅអគារមួយមានបន្ទប់តូចៗស្អាតប្រមាណ ៥០ បន្ទប់ រៀបចំសម្រាប់អ្នកបួសភេទស្រី រីឯប្តីខ្ញុំត្រូវទៅសម្រាកនៅអគារផ្សេង ដែលមានបន្ទប់សម្រាប់អ្នកបួសភេទប្រុសរស់នៅដាច់ៗពីគ្នា ។ ខ្ញុំពុំមានជំនឿលើសាសនាប៉ុន្មានទេ តែ



ដោយខ្ញុំមានដើមកំណើតនៅកម្ពុជាក្រោមជាគ្រួសារដែលគោរពយ៉ាងខ្ជាប់ខ្ជួននូវប្រពៃណីជាពុទ្ធសាសនិកខ្ញុំចង់ដឹងណាស់អំពីការដែលខ្ញុំត្រូវជឿ និងអ្វីដែលខ្ញុំត្រូវប្រណិបត្តិ ហើយអារម្មណ៍នេះបានសណ្ឋិតក្នុងខ្លួនខ្ញុំក្នុងភាពមិនស្របនៅជីវភាពពិតរបស់ខ្ញុំរាល់ថ្ងៃសោះ ហើយបានធ្វើឱ្យរូបខ្ញុំធ្លាក់ខ្លួនឈឺច្រើនដងនៅពេលដែលមានអារម្មណ៍មិនល្អមកដល់ជាច្រើនដង ។ ថ្ងៃនេះខ្ញុំសម្រេចចិត្តមកជាមួយប្តីខ្ញុំ ពីព្រោះគាត់ធ្លាប់ធ្វើវិប្បសនានេះបីដងរួចហើយ ហើយ

តទៅទំព័រទី ០៧

(តមកពីទំព័រទី ០១)

## ជំហានថ្មីនៃសិល្បៈបុរាណ...

យ៉ាងងាយស្រួលយល់ថែមទៀតផង ។ សាធារណជនភាគច្រើនជាបរទេសបានឃើញ ហើយកោតសរសើការបង្ហាញសិល្បៈរាប់ពាន់ឆ្នាំរបស់ខ្មែរមិនដាច់ពីមាត់ ។



នៅកន្លែងហាត់រាំមួយ នាកណ្ដាលក្រុង PERFORMANCE GARACE បានមានកិត្តិយស ជាទីបង្ហាញសិល្បៈខ្មែរ ដែលកំពុងវែកផ្លូវរកអនាគតថ្មីមួយ ដោយយកក្បាច់បុរាណខ្មែរដែលបានរៀនយ៉ាងស្ទាត់ជំនាញដោយ "សិល្បៈខ្មែរ " ហើយកែលំអរដោយភាសាសិល្បៈថ្មីៗ ពង្រីងទំហំនៃការបង្ហាញទ្រង់ទ្រាយទៅតាមសាច់រឿងនិពន្ធថ្មីៗបន្ថែមទៀតបាន ។



នៅភ្លេង បុរាណខ្មែរ ដែលធ្លាប់បានជូនដំណើររបាំទាំង នោះតាំងពីរាប់ពាន់ឆ្នាំមកហើយដូចគ្នា អ្នកស្រី សូភីលិន បាននិយាយថា " ភ្លេងក៏មានភាសាមួយរបស់វាដែរ ទោះជាភ្លេងនេះ មកពីវប្បធម៌ណាក៏ដោយនៅពេលដែលភ្លេងនោះ មានមនោសញ្ចេតនាដូចគ្នានឹងភាសានៃរបាំយើង គេអាចប្រើភ្លេងនោះជាមួយនឹងរបាំខ្មែរនេះបាន "។

សិល្បករអាមេរិកាំង ជប៉ុន ឥណ្ឌា អាហ្វ្រិក នៅសាលា PERFORMANCE GARACE នោះ បានធ្វើការចាប់អារម្មណ៍យ៉ាងវិជ្ជមានចំពោះ



ការបង្ហាត់របាំបុរាណខ្មែរដល់ពួកគេ ដោយបង្ហាញការច្បិចយកក្បាច់ខ្មែរខ្លះទៅដាក់នៅក្នុងភាសានៃរបាំរបស់ពួកគេផង ។ ពួកគេបានអរគុណអ្នកគ្រូបង្ហាត់ដោយកាយវិការ និងអារម្មណ៍សំពះគ្រូ ដែលពួកគេទើបនឹងបានហាត់រៀននាដើមខែតុលានេះ ៕ សូមរង់ចាំអានបទសម្ភាសន៍ជាមួយ សូភីលិន នៅលេខក្រោយ ៕





(តមកពីទំព័រទី ០៦)

## ស្វែងរកការ...

មិត្តភក្តិជាច្រើនក៏បានពន្យល់ និងផ្ដល់ការកក់ក្ដៅក្នុងចិត្តថា "អ្នកប្រាកដជានឹងបានយល់ពីជម្រៅនៃព្រះធម៌នោះ ថាជាអ្វីដោយខ្លួនឯងពីព្រោះ ធម៌ព្រះពុទ្ធនេះ ពុំមែនត្រឹមតែទ្រឹស្ដីទេ តែជាបច្ចេកទេសសម្រាប់ដោះទុក្ខឱ្យទទួលនូវសេចក្ដីស្ងប់បាន "។ ក្នុងកម្មវិធីសមាធិចំនួន ១០ ថ្ងៃរបស់ខ្ញុំ ខ្ញុំត្រូវសន្យាថា មិននិយាយរកនរណាទាំងអស់ក្រៅពីគ្រូធំខ្ញុំស្វែងរកការទាក់ទងដោយសំឡេង ឬសញ្ញាអ្វីទៅអ្នកដទៃទេ ហើយត្រូវនៅដាច់ដោយឡែកពីទំនាក់ទំនងស្រី និងប្រុស ខ្ញុំមិនត្រូវសម្លាប់ សូម្បីតែសត្វល្អិតក៏ដោយ។ ក្រៅពីនេះខ្ញុំត្រូវគោរពជួងដែលវាយម្ដងៗឮសម្លេងស្រួយយ៉ាងគ្រលួចគួរឱ្យចង់ចាំ គឺខ្ញុំត្រូវក្រោកម៉ោង៤កន្លះព្រឹក ហើយភាវនាតាមកម្មវិធីដែលបានផ្ដល់ឱ្យរហូតដល់ម៉ោង៩យប់ ទើបត្រឡប់ទៅសម្រាកវិញ ។ ខ្ញុំមានការព្រួយបារម្ភច្រើនចំពោះការអនុវត្តកម្មវិធីដ៏វែង ហើយលំបាកដែលជាបច្ចេកវិជ្ជាដែលព្រះពុទ្ធបានទុកឱ្យនេះ តែការប្ដេជ្ញាចិត្តរបស់ខ្ញុំហាក់ដូចជាធំធេងណាស់ ហើយងាយស្រួលធ្វើទៅវិញ ដោយមនុស្សទាំងប៉ុន្មានដែលមកចូលរួមភាវនានេះមានគ្រប់ចម្រុះសាសន៍មានក្មេងច្រើនជាងចាស់អ្នកកាន់សាសនាផ្សេងមានច្រើនជាងអ្នកកាន់ពុទ្ធសាសនា ហើយអ្នកទាំងនោះមកពីតំបន់ឆ្ងាយស្ទើរតែទាំងអស់គ្នាខ្ញុំយល់ភ្លាមថា ខ្ញុំធ្លាប់កាន់ព្រះពុទ្ធសាសនាស្រាប់មុខជាងាយស្រួលប្រណិបត្តិជាងគេជាមិនខាន ។

តទៅទំព័រទី ១៧

ឌឹ ខេមបូឌា ដេលី
The Cambodia Daily

ខួបទី៣៦ ច្បាប់ទី៧៣ ច្បាប់ចេញផ្សាយថ្ងៃសៅរ៍-អាទិត្យ ទី៣-៤ ខែតុលា ឆ្នាំ២០០៩ Saturday-Sunday, October 3-4, 2009

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស ព័ត៌មានក្នុងស្រុក និងអន្តរជាតិ News Translated From English

# ៤.០០០នាក់ត្រូវបានជម្លៀស ស្រែ៦.០០០ហិកតារងការខូចខាត

ដោយ ឈន ចាន់ស៊ី
THE CAMBODIA DAILY

●●●រដ្ឋាភិបាលបានរាយការណ៍កាលពីថ្ងៃសុក្រថា ទឹកជំនន់ដែលបណ្តាលមកពីព្យុះកំបុតត្បូងកេតសាណា ដែលបក់បោកលើជ្រោយអាស៊ីអាគ្នេយ៍កាលពីថ្ងៃអង្គារ បាននាំឱ្យមានការជម្លៀសប្រជាជនចំនួន ៤.៣៩០ គ្រួសារ ក្នុងរយៈពេល ៧២ ម៉ោង និងបានធ្វើឱ្យខូចខាតស្រែស្រូវ ១៣.៩២២ ហិកតា និងផ្ទះចំនួន ៨៣៨ ខ្នង ។

លោក ញឹម វណ្ណដា អនុប្រធានទី១ នៃគណៈកម្មាធិការជាតិគ្រប់គ្រងគ្រោះមហន្តរាយរបស់រដ្ឋាភិបាល ដែលបានចេញរបាយការណ៍នេះ បានថ្លែងតាមទូរស័ព្ទកាលពីថ្ងៃសុក្រថា ខេត្តកំពង់ធំ និងខេត្តរតនគិរី ជាតំបន់ដែលរងប៉ះពាល់ធ្ងន់ធ្ងរបំផុត ដោយសារព្យុះកំបុតត្បូងកេតសាណា បានបក់បោកលើប្រទេសកម្ពុជាកាលពីថ្ងៃអង្គារ ។ លោក ញឹម វណ្ណថា ក៏បានថ្លែងផងដែរ ថាសណ្ឋាគារ និងផ្ទះសំណាក់យ៉ាងហោចណាស់ ៣០ នៅក្នុងខេត្តសៀមរាម ត្រូវបានបិទដោយសារលំហូរទឹកដ៏ធំលើ្វងល្វើយពីខេត្តព្រះវិហារ ។ លោកបានថ្លែងថា " ព្យុះភ្លៀងបានបំផ្លាញផ្ទះជាច្រើន និងបានសម្លាប់មនុស្ស ៩ នាក់ ក្នុងខេត្តកំពង់ធំ ហើយផ្ទះជាច្រើនខ្នងត្រូវទឹកជន់លិចនៅឡើយក្នុងខេត្តរតនគិរី " ។ លោកបន្ថែមថា ការជន់លិចធ្ងន់ធ្ងរពីខ្សែទឹកខាងលើក្នុងប្រទេសវៀតណាម បានបណ្តាលឱ្យមានការជន់លិចភាគច្រើន ។

លោកបានថ្លែងថា លោកមានផែនការស្នើលោក នាយករដ្ឋមន្ត្រី ហ៊ុន សែន ឱ្យប្រើក្រសួង

តទៅទំព័រទី ១៣

# 4,000 Evacuated, 16,000 Hectares of Paddy Damaged by Ketsana

BY CHHOUN CHANSY
THE CAMBODIA DAILY

The government reported on Friday that floods caused by Typhoon Ketsana, which slammed into peninsular Southeast Asia this week, have led to the evacuations of 4,390 families within 72 hours, and damaged 15,922 hectares of rice paddy and 838 homes.



Nhim Vanda, first vice chairman of the government's National Committee for Disaster Management, which released the report, said by telephone on friday the Kompong Thom and Ratanakkiri provinces were the areas most-effected by Typhoon Ketsana, which slammed into Cambodia on Tuesday.

Mr. Vanda also said at least 30 hotels and guesthouses in Siem Reap had been shuttered due to the vast flows of water from Preah Vihear province.

"The storm damaged many houses and killed nine people in Kompong Thom and many houses are still flooded in Ratanakkiri," he said, adding that heavy flooding upstream in Vietnam had caused the majority of the overflow.

He said he was planning to ask Prime Minister Hun Sen to deploy the relative ministries to help farmers recover, or replant their ruined crops.

The death toll of 15 people killed by the typhoon has not risen, officials said Friday.

Pao Ham Phan, governor of Ratanakkiri province, said yesterday by telephone that water levels had reduced slightly

Continued on page 13

# តើខ្ញុំអាចសន្សំ 50%* រៀងរាល់ថ្ងៃពុធបានមែនឬ?

ឥឡូវនេះ អ្នកអាចផ្ញើប្រាក់បានកាន់តែងាយស្រួលទៅមនុស្សជាទីស្រឡាញ់របស់អ្នក តាមរយៈសេវាកម្មផ្ទេរប្រាក់រហ័សទាន់ចិត្ត និងគួរឲ្យទុកចិត្តរបស់ Western Union ។ រាល់ការផ្ញើប្រាក់នៅរៀងរាល់ថ្ងៃពុធ អ្នកអាចសន្សំបាន 50% លើថ្លៃសេវាកម្មផ្ទេរប្រាក់ ជាធម្មតាចំនួន 9.99 ដុល្លារ។ នេះជាអត្ថប្រយោជន៍ថ្មីមួយដែល Western Union ផ្តល់ជូនអ្នក និងក្រុមគ្រួសារអ្នក។

Yes!




ផ្ញើប្រាក់ទៅមនុស្សជាទីស្រឡាញ់របស់អ្នកនៅកម្ពុជា

happywednesday

1-800-325 6000

*ក្រៅពីកម្រៃសេវាកម្មផ្ទេរប្រាក់ Western Union ក៏រកកម្រៃផងដែរ នៅពេលប្រាក់ត្រូវបានប្តូរពីរូបិយប័ណ្ណដុល្លារទៅរូបិយប័ណ្ណផ្សេងទៀត។ សេវាកម្មផ្ទេរប្រាក់ក្នុងកម្មវិធីនេះរួមមាន: សេវាកម្មផ្ទេរប្រាក់ភ្លាមៗ សេវាកម្មថ្ងៃបន្ទាប់ សេវាកម្មផ្ទេរប្រាក់ផ្ទាល់ទៅធនាគារ សេវាកម្មបញ្ជូនប្រាក់ទៅផ្ទះនៅពេលយប់ និងសេវាកម្មផ្ទេរប្រាក់រហ័សដែលផ្តល់ជូនសម្រាប់ការផ្ទេរប្រាក់ពីសហរដ្ឋអាមេរិកទៅកាន់ទីកន្លែងផ្សេងៗ។ សេវាកម្មផ្ទេរប្រាក់តាមម៉ាស៊ីន ATM មិនត្រូវបានអនុញ្ញាតឡើយ។ ការផ្តល់ជូននេះ មិនត្រូវបានប្រើរួមគ្នាជាមួយការផ្តល់ជូនផ្សេងទៀតឡើយ។



# A.B.C MONEY TRANSACTION, INC



## ក្រុមហ៊ុនផ្ញើប្រាក់ A.B.C



### តម្លៃសំរាប់ផ្ញើទៅស្រុកខ្មែរ

| | | ភ្នំពេញ | តាមខេត្ត |
|---|---|---|---|
| ផ្ញើ $100 | យកកម្រៃ | $4.50 | $5.50 |
| $200 | យកកម្រៃ | $9.00 | $11.00 |
| $300 | យកកម្រៃ | $13.50 | $16.50 |
| $500 | យកកម្រៃ | $16.00 | $17.00 |
| $1000 | យកកម្រៃ | $25.00 | $26.00 |
| $1500 | យកកម្រៃ | $35.00 | $36.00 |
| $2000 | យកកម្រៃ | $42.00 | $43.00 |
| $2200 | យកកម្រៃ | $46.00 | $47.00 |



សូមកុំភ្លេចទាក់ទងការិយាល័យក្រុមហ៊ុន ABC ដែលនៅជិតលោកអ្នក ប្រសិនបើមានបំណងចង់ផ្ញើប្រាក់ទៅស្រុកខ្មែរ ឬក៏ទូរស័ព្ទមកយើងតាម

**នៅរដ្ឋ VIRGINIA សូមទាក់ទង**

**ABC MONEY TRANSATION ,INC.**

8 locations to serve you in Virginia

- 6757 Willson Blvd.-Ste.#25 Tel : 703.534.2600
- 4291 Holland Rd-Ste.#111 Tel : 757.474.9400
- 10428 Ridgefield Pkwy Tel : 804-740-2454
- 2519 W . Mercury Blvd . Tel : 757.265.6305
- 23520 Overland Dr. Tel : 703.661.6666
- 6314 Rigsby Rd. Tel : 804.288.2988
- 7252 Arlingston Blvd . Tel : 703.641.0778
- 6217 W. Broad St. Tel : 804.288.6988

**ARIZONA**

◆4215 N 19th Ave. . Tel : 602.266.6744

**GEOERGIA**

◆ 4897 Buford Hwy. Ste. 202. Tel: 770.457.7888

**ILLINOIS**

◆4871 N. Broadway . Tel :773.989.7332

**MASSACHUSETTE**

◆ 996 Dorchester Ave. Tel:617.825.9380

◆ 1365-1377 Dorchester Ave. -Ste.4,Froor 1 .Tel : 617.265.4600

**MINNESOTA**

◆ 2718 Nicollet Ave . S.- Ste. 102 B

◆ Tel : 612.871.4731

◆ 6350 Brooklyn Blvd . Tel : 763.503.3947

**NORTH CAROLINA**

◆ 3000 Central Ave. Ste . #9 . Tel : 704-532-4420

**OREGON**

◆6908 N.E. Sandy Blvd . Tel : 503.281.8088

**PHILADFELPHIA**

◆5520 . Whitaker Ave. -Unit 2 . Tel : 215.831.9794

◆571 Adams Ave . Ave.#4 . Tel : 215.342.6623

**TEXAS**

◆1818 E . Pioneer Pkwy. Ste.156 . Tel : 317.461.1461

◆2615 W . Pioneer Pkwy. Ste.136 . Tel : 214.788.2817

◆5302 E . Belknap St.- Ste.D6 . Tel : 817.831.4836

◆3538 W . Walnut St. Tel : 972.272.2253

◆11205 Bellaire Blvd . Tel : 281.561.6600

◆10909 Scarsdale Blvd . Tel : 281.481.2700

◆13480 Veterans Memorial Dr.-Ste. F2. Tel: 281.587.0807

**WASHINTON STATE**

◆766 S.38th St,. Tel : 253.475.2847

◆3818 S.Graham St.-Ste. C Tel : 206.721.2070

Office : 714-590-8740 Fax : 714-590-8776
Cell: 714-603-3509 Toll Free : 1-877-939-0110

## ក្រុមហ៊ុនទទួលផ្ញើប្រាក់ទៅកម្ពុជា

ABC ជាក្រុមហ៊ុនផ្ញើប្រាក់តែមួយគត់នៅស្រុកខ្មែរ ដែលមានការប្រគល់ប្រាក់ដល់ផ្ទះ

- ស្របច្បាប់
- រហ័សទាន់ចិត្ត
- ធានារ៉ាប់រង និងជូនប្រាក់ទៅដល់ផ្ទះ
- កំរៃផ្ញើថោកជាងកន្លែងដទៃ

### ក្រៅពីការផ្ញើប្រាក់ក្រុមហ៊ុនមានលក់

PHONE CARD និង PINLESS សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ដែលផលិតដោយក្រុមហ៊ុន ABC ផ្ទាល់ មានគុណភាពល្អ ហើយជាពិសេស CARD របស់យើងនឹងទុកបានរហូត មិនអស់កំណត់កាលឡើយ ( NEVER EXPIRED) ។

ត្រូវការអ្នកសហការ (AGENTS ) ជាមួយយើងទូទាំងសហរដ្ឋអាមេរិក និងបានទទួលប្រាក់ចំណូលយ៉ាងខ្ពស់ !

ព័ត៌មានបន្ថែមសូមទាក់ទង CHET THACTHER តាមទូរស័ព្ទ និងអាស័យដ្ឋានខាងក្រោម :

ABC MONEY TRANSATION, INC
12019 Garden Grove Blvd., Ste.#204
Garden Grove , CA 92843
chesterthatcher@yahoo.com

(តមកពីទំព័រទី ០១)

# តាំងពិពណ៌ផលិតផលនៅ...

ចម្រុះនៅក្នុង និងជុំវិញតំបន់នៅក្រុងហ្វីឡាដែល-ហ្វីយ៉ានេះ មកតាំងបង្ហាញផលិតផលរបស់ខ្លួន និងស្នាដៃតែរៀងៗខ្លួន ក្នុងបំណងចង់ឃើញឡូគ្កាន់ ប្តូរសោភ័ណ្ឌភាពឱ្យកាន់ឱ្យបានប្រសើរឡើងបាន ។

ថ្ងៃនោះប្រជាពលរដ្ឋមិនសូវជាណែនណាន់តាន់តាប់អ្វីទេ ដោយសារមេឃមិនអំណោយផលផង និងកម្មវិធីបានប្តូរផង ដោយលើក១អាទិត្យ ដោយសារមេឃដដែលនេះ ។ "វេដមេឌីខល " (WEDGE) និង " ប៉ាស៊ីហ្វិក រីម " (PACIFIC RIM) ដែលជាអ្នកផ្តួចផ្តើមគំនិតបានរៀបចំតុបតែងតុយ៉ាងវែងបង្ហាញកិច្ចការ

ក្រុមអតីតយុទ្ធជនស្ម័គ្រចិត្តជាច្រើននាក់ ដែលធ្វើការណែនាំដោយលោក សិរិត ប៉ែន បានចេញមកបង្ហាញទឹកចិត្តពួកគាត់នៅជាប់ជាមួយសហគមន៍ជាគ្រួសារដ៏ធំមួយ ។ ក្រុមទាំងប៉ុន្មាននេះបានទទួលការលើកទឹកចិត្ត និងគាំទ្របំណងលើកតំកើងគ្រួសារខ្មែររបស់ពួកគេ ដោយអង្គការសំខាន់មួយនៅផែនស៊ីវេនានេះ គឺ MHASP ( Mental Health Association of Southesthern Pennsylvania) អង្គការទាំងនេះចង់ណែនាំឱ្យគ្រួសារខ្មែរក្នុងតំបន់ចេញមុខនាំគ្នាដោះស្រាយបញ្ហាជាច្រើន ដែលកំពុងកើតរីករាលដាលក្នុងសហគមន៍ខ្មែរប្រកបដោយក្តី

បរទេស នៅវិហារផ្លូវ Rockland ជារៀងរាល់ថ្ងៃ ដោយមានល្បែងលេងកំសាន្តកុំឱ្យអផ្សុក និងមានម្ហូបអាហារទទួលទានតាំងពីព្រឹកដល់ថ្ងៃត្រង់ទៀតផង ។ ខ្មែរយើងជាច្រើនពុំសូវដឹងការទទួលភ្ញៀវរបៀបរនេះទេ ។

សហគម "ឡូគ្កាន់ ហូព " (LOGAN HOPE) បានតាំងតុ ដោយមានសៀវភៅ និងល្បែងសំរាប់ទាក់ទាញកុមារឱ្យទទួលការណែនាំ ដែលនៅឡូគ្កាន់នេះ គេត្រូវការសហគមរបៀបនេះណាស់។ ឡូគ្កាន់ ហូព គឺជាអង្គការមួយដែលបានធ្វើសកម្ម-ភាពជាច្រើនសំរាប់កុមារ ជាពិសេសកុមារខ្មែរ ។

សហគមសម្រាប់គ្រប់គ្រងមនុស្សចាស់ ដូចជា CPA បើទោះជាជាន់សកម្មភាពនៅថ្ងៃជាមួយគ្នាក៏ដោយ ក៏ឆ្លៀតមកបង្ហាញផលិតផលសំរាប់


សមាគមខ្មែរ


LOGAN HOPE



"វេដ" WEDGE MEDICAL



ក្រុមអ្នកគាំទ្រគ្រួសារខ្មែរ ក្រុមយុទ្ធជនស្ម័គ្រចិត្ត និងខ្មែរប៉ុស្តិ៍


DBH


NSC

ដែលអង្គការបានទទួលភារៈជួយប្រជាពលរដ្ឋមានទាំងសុខភាពផ្លូវកាយផ្លូវចិត្ត ជួយខាងកិច្ចការរដ្ឋបាល មានក្រដាសស្នាម ជួយទាំងសង្គមកិច្ច ដូចជាការខ្វះខាតជាដើម... ។ល ។

ទទួលភ្ញៀវផង រៀបចំផង ណារី គិត អមដោយអ្នកទទួលភ្ញៀវដ៏ចំណាប់របស់ខ្លួនច្រើននាក់ បាននាំឱ្យអ្នកតាំងតុឡើងលើវេទិកាបង្ហាញពីសមត្ថភាពនៃអង្គការរបស់ខ្លួនគ្រប់ៗគ្នា ។

សហគមន៍ខ្មែរថ្ងៃនេះ បានបង្ហាញភាពស្វា-ហាប់របស់ខ្លួនជាពិសេស ដោយ "ក្រុមអ្នកគាំទ្រគ្រួសារខ្មែរ " បាននាំគ្នាលើកស្លាកយ៉ាងធំសំដែងការពេញចិត្តនឹងកម្មវិធីសំរាប់សហគមន៍ខ្មែរ ភ្ជាប់ដោយខ្មែរប៉ុស្តិ៍ ដែលមានបណ្តាញទាក់ទងអ្នកអានដ៏ធំមួយ ហើយជាមួយគ្នានោះក៏មាន

សង្ឃឹមយ៉ាងកក់ក្តៅ ។ លោក ម៉ម យីន លោក គិម ភៀន និង សុបិន ថាច់ បាននាំក្រុមតន្រ្តីខ្មែរភ្លោះបីរូបមកកំដរ ហើយនាំទាំងកុមារស្លៀកពាក់ជាខ្មែរមកបង្ហាញពីវប្បធម៌របស់ជនជាតិខ្លួននៅលើឆាកយ៉ាងសង្ហារទៀតផង ។

សមាគមខ្មែរថ្ងៃនេះ ដោយសារការផ្លាស់ប្តូរថ្ងៃប្រារព្ធពិធីក៏បានខកខានពុំបាននាំយកកម្មវិធីសិល្បៈរបាំបូរាណខ្មែរ មកបង្ហាញជូនសាធារណជនដូចបានគ្រោងទុកទេ តែក៏តាំងតុរបស់ខ្លួនបង្ហាញជាស្នាដៃខ្លួនដែរ ។

សមាគមដ៏ប្រជាប្រិយមួយទៀត ក៏ទាក់ទាញការចង់ដឹងពីសាធារណជនដែរ គឺ "ក្រុមជំនួយដល់មនុស្សចាស់ N.S.C" ក្រុមនេះបានបង្ហាញការយកចិត្តទុកដាក់ពីចាស់ទាំងខ្មែរ ទាំង


លោក សិរិត ប៉ែន បង្ហាញពីសមាសភាពអតីតយុទ្ធជនស្ម័គ្រចិត្តខ្មែរ

ជួយដល់មនុស្សចាស់ដែរ ។ ចាស់ៗខ្មែរជាច្រើនបានទទួលសេវាសុខភាពផ្លូវកាយ និងផ្លូវចិត្តពី CPA ខ្លះហើយ ។

ចំណែកឯអង្គការសុខភាពខាងចរិយា (DBH) បានតាំងតុរបស់ខ្លួនពោរពេញទៅដោយរបស់សម្រាប់ចែកជូនជាអនុស្សាវរីយ៍-អង្គការនេះមានសកម្មភាពសម្រាប់ជួយសហគមន៍ខាងសេវាសុខភាពផ្លូវកាយផ្លូវចិត្ត ដែលនៅរដ្ឋផែនស៊ីវេនានេះ អង្គការសេវាកម្មជាទីបំផុតសំរាប់បំរើពលរដ្ឋ ។ ខ្មែរយើងជាច្រើនបានទទួលសេវាកម្ម DBH ដោយពុំបានដឹងថា ទទួលពី DBH ផង ពីព្រោះអង្គការនេះ ច្រើនជួយជាប្រយោលដោយផ្តល់ថាមពលឱ្យអង្គការ សហ-គមនានា ដែលនៅជិតពលរដ្ឋខ្លួនធ្វើជំនួស ។

នៅមានអង្គការព្យាបាលខ្លះទៀត ដែលទាក់ទាញភ្ញៀវឱ្យមកទទួលការផ្តល់ព័ត៌មានដោយវាស់កំរិតឈាម ឬខ្លះទៀត ដូចជា មន្រ្តីព្រឹទ្ធសភា " គិត ឆិន " ក៏តាំងតុរបស់លោកស្រី ដើម្បីពន្យល់ពីការងាររបស់លោកចំពោះពលរដ្ឋដែរ ។

ពលរដ្ឋខ្មែរក្នុងតំបន់ ថ្វីត្បិតតែពុំសូវយល់ជ្រៅជ្រះនូវភាសាសម្រាប់ទាក់ទងគ្នា តែគេឃើញអង្គការនីមួយៗ ប្រឹងប្រែងរកអ្នកនិយាយភាសាខ្មែរ មកចូលតាំងពិពណ៌យ៉ាងគួរឱ្យកត់សំគាល់ ។ រីឯពលរដ្ឋខ្មែរ ហាក់ដូចជាសំដែងការរីករាយនឹងបានជួបជុំមនុស្សប្លែកៗ មកពីទិឆ្ងាយជិត ដោយរាក់ទាក់ និងដោយគ្មានរុញរាទំនងជារនាំងភាសាត្រូវធ្លាក់ចុះដោយការនាំគ្នា


កូនបីភ្លោះបីនាក់ នៃក្រុមតន្រ្តីអ្នកគាំទ្រគ្រួសារខ្មែរ


ណារី និងសារឿន កំពុងបង្ហាញ កម្មវិធី Buildin the Bridge

និយាយភាសាខ្មែរនៅទីនោះ ហើយម្យ៉ាងទៀតផលិតផលខ្មែរ ដែលបានតាំងមានចំនួនច្រើន ។ ក្រុមអ្នកគាំទ្រគ្រួសារខ្មែរ អតីតយុទ្ធជនស្ម័គ្រចិត្ត បានបង្ហាញភាពស្វាហាប់ និងសកម្មធ្វើឱ្យភ្ញៀវជាច្រើនមានការចាប់អារម្មណ៍យ៉ាងខ្លាំង ។ គេសង្ឃឹមថា ការរៀបចំពិពណ៌របៀបនេះ កំពុងតែប្តូរតំបន់ឡូគ្កាន់ និងផ្លូវអូលយ៉ក ឱ្យសហគមពាណិជ្ជករ និងអតិថិជនឱ្យត្រឡប់មកតំបន់នេះវិញជាមិនខាន ៕

ឌឹ ខេមបូឌា ដេលី

The Cambodia Daily

ខួបទី៣៦ ច្បាប់ទី៧៣ ច្បាប់ចេញផ្សាយថ្ងៃសៅរ៍-អាទិត្យ ទី៣-៤ ខែតុលា ឆ្នាំ២០០៩ Saturday-Sunday, October 3-4, 2009

ជំណឹងប្រែសំរួលពីភាសាអង់គ្លេស ព័ត៌មានក្នុងស្រុក និងអន្តរជាតិ News Translated From English


# លោកស្រី មូរ សុខហួរ ឡើងតុលាការ

## ដោយសារបណ្តឹងឧទ្ធរណ៍ត្រូវបានច្រានចោល

**ដោយ ឃី សុវុទ្ធី**

THE CAMBODIA DAILY

●●●លោកស្រី មូរ សុខហួរ សមាជិកសភាគណបក្ស សម រង្ស៊ី បានបង្ហាញខ្លួននៃសាលាឧទ្ធរណ៍កាលពីថ្ងៃសុក្រ ដើម្បីឆ្លើយសំនួរអំពីបណ្តឹងឧទ្ធរណ៍របស់លោកស្រី ស្តីពីការច្រានចោលបណ្តឹងបរិហាកេរ្តិ៍របស់លោកស្រីប្រឆាំងនឹងលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន កាលពីថ្ងៃទី ១០ ខែមិថុនា ដោយតុលាការក្រុងភ្នំពេញ ។

បន្ទាប់ពីត្រូវបានចោទសួរដោយលោក អ៊ុក សាវុធ អគ្គព្រះរាជអាជ្ញា លោកស្រី មូរ សុខហួរ បានប្រាប់អ្នកសារព័ត៌មានថា លោកស្រីបានបន្តបណ្តឹងឧទ្ធរណ៍ ពីព្រោះបើទោះណាជាលោកស្រីមិនមានភស្តុតាងថ្មីសម្រាប់ដាក់ជូនក៏ដោយ ក៏លោកស្រីចង់យកឱកាសនេះ ដើម្បីដាក់រឿងក្តីរបស់លោកស្រីចំពោះមុខចៅក្រម ។

ដោយសំដៅដល់ការអត្ថាធិប្បាយរបស់លោកនាយករដ្ឋមន្ត្រី ដែលថាស្ត្រីមិនចេញឈ្មោះម្នាក់បានអោបមន្ត្រីកងយោធពលខេមរភូមិន្ទម្នាក់ជាសាធារណៈនោះ លោកស្រីបានមានប្រសាសន៍ថា " ខ្ញុំបានសួរលោក អ៊ុក សាវុធ ថាតើលោកមានអារម្មណ៍ដូចម្តេច ប្រសិនបើនរណាម្នាក់និយាយថា កូនស្រី ឬប្រពន្ធរបស់លោក បានទៅអោបគេនោះ ។ លោកស្រីបានមានប្រសាសន៍ថា វានឹងធ្វើឱ្យខូចទាំងកេរ្តិ៍ឈ្មោះរបស់លោក និងវប្បធម៌ខ្មែរ ។ ខ្ញុំបានក្រឡេកមើលមុខរបស់គាត់ ហើយគាត់ហាក់ដូចជាយល់ពីអ្វីដែលខ្ញុំបាននិយាយ " ។ លោកស្រី មូរ សុខហួរ បានបន្ថែមថា ប្រសិនបើបណ្តឹងឧទ្ធរណ៍របស់លោកស្រី ត្រូវបានអនុញ្ញាតនោះ លោកស្រីនឹងដើរតួជាមេធាវីដោយខ្លួនឯងនៅក្នុងដំណើរការកាត់ក្តីនាពេលខាងមុននេះ ។

លោក អ៊ុក សាវុធ បានមានប្រសាសន៍តាមទូរស័ព្ទថា " លោកស្រី មូរ សុខហួរ បានមកតុលាការ ដើម្បីឆ្លើយសំនួរនានាអំពីបណ្តឹងរបស់លោកស្រី និងអំពីថា តើលោកស្រីមានភស្តុតាងបន្ថែមណាមួយទេ ពីព្រោះរឿងក្តីរបស់លោកស្រីត្រូវបានតុលាការច្រានចោលរួចហើយ ។ ខ្ញុំនឹងពិនិត្យមើលភស្តុតាងទាំងអស់ឡើងវិញ បន្ទាប់មកសម្រេចថា តើត្រូវអនុញ្ញាតឱ្យធ្វើបណ្តឹងឧទ្ធរណ៍ ឬក៏អត់ ៕

# Mu Sochua in Court Over Lawsuit Dismissal Appeal

SRP lawmaker Mu Sochua appeared at the appeal Court on Friday to answer question about to appeal of the Phnom Penh Municipal Court´s June 10 dismissal her defamation Lawsuit against Prime Minister Hun Sen. After being questioned by Prosecutor General Ouk Sovuth, Ms Sochua told journalists that she was pursuing an appeal because, although she had no new evidence to submit, she wanted the chance to put her case before a judge. Referring to the premier´s comments that an unnamed woman had publicly embraced someone, she said, "I asked Ouk Sovuth how he would feel if some body said that his daughter or wife went and hugged someone. It would be defaming both his family and Khmer culture. I looked at his face, and he seemed to understand what I was saying." Ms Muchua added that if her appeal is granted, she will as her own lawyer in future proceedings. Mr Sovuth said later by telephone "Ms Mu Sochua was in court to answer question about her lawsuit and about whether she has any additional proof, because her case was already dismissed by the municipal court. I will review all of the evidence and then decide whether to grant the appeal or not." (Khy Sovuthy)

(តមកពីទំព័រទី ០២) **រាត្រីថ្ងៃសៅរ៍...**

ហើយឥឡូវនេះបានចូលដល់ លីបាណុង ឬ ហារីប៊ើត ហើយ ។


លោក ព្រុំ ហ៊ន និងភរិយា

លោក ព្រុំ ហ៊ន អតីតនាយទាហាន ដែលមកដល់ លីបាណុង នេះមុនគេ កាលពី៣០ឆ្នាំមុន និយាយថា " មានខ្មែរប្រមាណ៥ពាន់នាក់ រស់នៅជុំវិញតំបន់ហារីប៊ើតនេះ - នៅទីនេះខ្មែរយើងស្រុះស្រួលគ្នាណាស់ មានការងារធ្វើស្មើរគ្រប់គ្នា ពុំសូវមានអ្នកទទួលប្រាក់ជំនួយរដ្ឋទេ រីឯកូនចៅពុំសូវបោះបង់សាលារៀនទេ ដោយសារការគ្រប់គ្រងល្អពីម្តាយឪពុក ។

នៅ លីបាណុង មានខ្មែរប្រមាណ៣០គ្រួសារតែប៉ុណ្ណោះ តែការស្រុះស្រួលគ្នាក្នុងតំបន់ ធ្វើឱ្យសកម្មភាពសង្គម អាចអញ្ជើញខ្មែរ នៅតំបន់ដទៃជុំវិញឱ្យចូលរួម ហើយក្លាយទៅជាអ៊ឹកធ៊ឹកបាន ។ នៅរាត្រីថ្ងៃសៅរ៍នោះ លោក សំបូរ ពេជ និយាយថា "ភ្លៀងបានឃាត់ភ្ញៀវអស់ពាក់កណ្តាល ៕

(តមកពីទំព័រទី ០៤) **៤.០០០នាក់ត្រូវបានជម្លៀស...**

នានាដែលពាក់ព័ន្ធទៅជួយប្រជាកសិករ ឬដាំដំណាំដែលខូចខាតរបស់ពួកគេឡើងវិញ ។

ក្រុមមន្ត្រីបាននិយាយកាលពីថ្ងៃសុក្រថា ចំនួនមនុស្សស្លាប់ ១៥នាក់ ដោយព្យុះកំបុត ត្បូងនេះមិនបានកើតឡើងទៀតទេ។

លោក ប៉ាវ ហំផាន អភិបាលខេត្តរតនគីរី បានថ្លែងកាលពីម្សិលមិញតាមទូរស័ព្ទថា កំរិតទឹកបានស្រកបន្តិចបន្តួចនៅស្រុកអណ្តូងមាស និងស្រុកតាវែង ប៉ុន្តែទឹកបានឡើងនៅស្រុកវើនសៃ និងស្រុកលំផាត់ ។ លោកបានថ្លែងថា មនុស្សរាប់ពាន់នាក់នៅក្នុងខេត្តនេះ បានភៀសចេញទៅនៅទីទួលខ្ពស់ដោយគ្មានការធានាថា ផ្ទះរបស់ពួកគេនឹងនៅដដែលនៅពេលទឹកជំនន់ស្រកទេ ។ លោកបានបន្ថែមថា ការជន់លិចធ្ងន់ធ្ងរនេះធ្វើឱ្យអាជ្ញាធរនៅក្នុងខេត្តនេះ មិនអាចផ្តល់ជំនួយស្បៀងអាហារ និងការផ្គត់ផ្គង់ថ្នាំពេទ្យទេ ។ លោកបានថ្លែងថា " យើងមិនអាចព្យាករណ៍ថា នៅពេលណាទឹកជំនន់នេះនឹងស្រកនោះទេ ។ ប្រសិនបើប្រទេសវៀតណាម ទទួលសំពាធទាបបន្ថែមទៀត ពេលនោះភ្លៀងខ្លាំងនឹងប៉ះពាល់ដល់កម្ពុជា " ។

លោក ម៉ៅ ហាក់ ប្រធាននាយកដ្ឋានធនធានទឹក នៅក្រសួងធនធានទឹក និងឧតុនិយម បានថ្លែងថា តំបន់នៅតាមដងទន្លេមេគង្គស្ថិតនៅក្នុងការប្រកាសអាសន្ននៅឡើយទៅនឹងការជន់លិចនេះ ។ ទោះជាយ៉ាងនេះក្តី លោកបានថ្លែងថា ភ្នំពេញនឹងចៀសផុតពីការជន់លិច ដោយកម្រិតទឹកនៅទាបជាងឆ្ងាយពីកម្រិតប្រកាសអាសន្ននៅឡើយ ។

យោងតាមទិន្នន័យពីក្រសួងធនធានទឹក និងឧតុនិយមឱ្យដឹងថា កម្រិតទឹកទន្លេមេគង្គក្នុងខេត្តស្ទឹងត្រែង មានកំពស់ ១០.១៤ ម៉ែត្រ កាលពីថ្ងៃសុក្រ គឺ ៥៦ សង់ទីម៉ែត្រ ខ្ពស់ជាងកាលពីថ្ងៃព្រហស្បតិ៍ ។ នៅក្នុងខេត្តក្រចេះកម្រិតទឹកបានឡើងដល់ ២០.៦៨ ម៉ែត្រ គឺឡើងដល់ ៨៨ សង់ទីម៉ែត្រពីថ្ងៃមុន ។ លោក គៀត ច័ន្ទថារិទ្ធ អ្នកនាំពាក្យរបស់ប៉ូលិសជាតិ បានបញ្ជាក់កាលពីថ្ងៃសុក្រថា នាយប៉ូលិស ១៦០ នាក់ ត្រូវបានបញ្ជូនទៅកាន់ខេត្តកំពង់ធំ ដើម្បីជួយសាងសង់ផ្ទះរបស់អ្នកភូមិ ដែលគ្មានជំរកឡើងវិញ ៕

*( Continued from page 08 )* **4,000 Evacuated,...**

in Andong Meas and Taveng Districts, but had risen in Veun Sai and Lumphat districts.

Thousands of people in the province have fled to higher ground with no assurance that their homes will still be standing when floodwaters subside, he said. Severe flooding had also prevented authorities in the province from providing food aid and medical supplies, he added.

"We cannot predict when the floodwaters will reduce," he said. "if Vietnam gets any more low pressure then heavy rain will affect Cambodia."

Mao Hak, director of the water resources department in the Ministry of Water Recourses and Meteorology, said that area lining the Mekong River were still on red alert against flooding. However, he said that Phnom Penh would avoid any flooding with water levels still far below the emergency threshold.

According to data from the Ministry of Water Resources and Meteorology, water levels of the Mekong River in Stung Treng province were at 10:14 meters on Friday, 56 cm higher than on Thursday. In Kratie province, water levels rose to 20.68 meters, up 88 cm from the previous day.

Kirth Chantharith, spokesman for the National Police, confirmed on Friday that 160 police officers had been sent to Kompong Thom province to help rebuild the houses of homeless villagers.

## (តមកពីទំព័រទី ០១) ខួបឆ្នាំទីពីរខ្មែរប៉ុស្ដិ៍ជួយដល់ក្រុមនិស្សិត...



មាជ សុវណ្ណារ៉ា ថ្លែងទៅកាន់ភ្ញៀវកិត្តិយស



ព្រះសង្ឃមានសង្ឃដីកាចំណាប់អារម្មណ៍ពីកាសែតខ្មែរប៉ុស្ដិ៍



ទិដ្ឋភាពក្នុងពិធីខួបគំរប់2ឆ្នាំនៃកាសែតខ្មែរប៉ុស្ដិ៍ (រូបថត វ៉ាន់ថា ឯល)

បងប្អូនខ្មែរទាំងនោះមកពីទីក្រុង L.A, San Diego ពិសេស អ្នករស់នៅទីក្រុងខ្មែរ Long Beach និងក្រុងមួយចំនួនទៀត ក្នុងទឹកចិត្តរីករាយចូលរួមវិភាគទានជាប្រាក់ដើម្បីជួយគាំទ្រដល់ក្រុមនិស្សិតក្រីក្រ ដែលកំពុងស្ថិតក្រោមការគ្រប់គ្រងរបស់កាសែតខ្មែរប៉ុស្ដិ៍ គឺ **"មូលនិធិសិក្សាធិការខ្មែរ"** បាននាំគ្នាអះអាងថា កើតជាខ្មែរត្រូវតែនាំគ្នាជួយខ្មែរទៅតាមលទ្ធភាពដែលអាចធ្វើទៅបាន ដូចជា បញ្ហាអប់រំ គឺវាសំខាន់ណាស់សំរាប់ការអភិវឌ្ឍន៍សង្គមជាតិឱ្យបានរីកចំរើនតាមរយៈអ្នកចេះដឹងមានចំណេះវិជ្ជាខ្ពង់ខ្ពស់ ។

លោកពូ សុផុន បានប្រាប់ខ្មែរប៉ុស្ដិ៍ឱ្យដឹងថា កម្មវិធីជួយនិស្សិតក្រីក្រ គឺជាកម្មវិធីមួយជួយបំបាត់នូវភាពអវិជ្ជាជួយឱ្យគ្រួសារអ្នកទីទ័លក្រមានលទ្ធភាពឱ្យកូនបានទៅកាន់សាលារៀនដូចក្រុមគ្រួសារត្រកូលអ្នកមានផងដែរ ។ ការជួយគាំទ្របណ្ដុះបណ្ដាលផ្នែកចំណេះដឹង គឺជាការពង្រីកធនធានមនុស្ស ដើម្បីរួមចំណែកការអភិវឌ្ឍន៍សង្គមមួយប្រកបដោយសីលធម៌ សុខសន្តិភាព ក្រោមរូបភាពសហការសាមគ្គីគ្នាក្នុងការកាត់បន្ថយនូវអំពើហិង្សាអសន្តិសុខសង្គមទៅថ្ងៃអនាគត ។

ចាងហ្វាងកាសែតខ្មែរប៉ុស្ដិ៍ និងជាប្រធានក្រុមប្រឹក្សាភិបាលរបស់មូលនិធិសិក្សាធិការខ្មែរ លោក មាជ សុវណ្ណារ៉ា បានថ្លែងថា បច្ចុប្បន្ននមាននិស្សិតក្រីក្រចំនួន16នាក់ ដែលស្ថិតក្រោមការគ្រប់គ្រងរបស់មូលនិធិខ្មែរប៉ុស្ដិ៍ដែលពួកគេកំពុងរៀនសូត្រនៅតាមមហាវិទ្យាល័យនានាក្នុងខេត្តបាត់ដំបង ដែលកម្មវិធីនេះ បានចាប់ផ្ដើមតាំងពីឆ្នាំ 2008 ។ ពួកគេភាគច្រើនជាក្មេងកំព្រា និងមានជីវភាពក្រីក្របំផុត គ្មានលទ្ធភាពបន្តការសិក្សាបានដោយកម្មវិធីនេះ គឺគាំទ្រថវិកាដោយបងប្អូនខ្មែរ-អាមេរិកាំង ដែលជាអ្នកចុះផ្សាយពាណិជ្ជកម្ម និងមិត្តអ្នកអានកាសែតខ្មែរប៉ុស្ដិ៍ ទើបអាចដំណើរការទៅបាន ។ លោក មាជ សុវណ្ណារ៉ា បានអះអាងថា ការធ្វើពិធីខួបកាសែតខ្មែរប៉ុស្ដិ៍គម្រប់2ឆ្នាំ ដើម្បីរៃអង្គាសថវិកាជួយដល់និស្សិតក្រីក្របងប្អូនខ្មែរមិនថាម្ចាស់ចុះផ្សាយពាណិជ្ជកម្ម និងមិត្តអ្នកអានមានទឹកចិត្តសប្បុរសធម៌នាំគ្នាចូលលុយជួយដែលសរុបបានថវិកាចំនួន 2,955 ដុល្លារអាមេរិក ។ ដោយលោកបានបញ្ជាក់ថា នេះ គឺជាបេះដូងដ៏បរិសុទ្ធរបស់បងប្អូនខ្មែរ-អាមេរិកាំងដែលមានទឹកចិត្តមនុស្សធម៌ជួយគាំទ្រដើម្បីកសាងមាតុភូមិរបស់ខ្លួន ដោយចង់ឃើញសង្គមកំណើតខ្លួនពោរពេញទៅដោយអ្នកចេះដឹងរួមគ្នាកែប្រែសង្គមដែលប្រកបទៅដោយសីលធម៌រវាងអ្នកដឹកនាំ និងពលរដ្ឋយល់គ្នាដោយយកចំណេះវិជ្ជាមកអនុវត្ត ។ ដែលចំណេះវិជ្ជានោះហើយធ្វើឱ្យមនុស្សយល់ដឹងច្រើននាំគ្នាគោរព ច្បាប់ជាធំដែលមិនរំលោភបំពានជិះជាន់គ្នា ប្រព្រឹត្តអំពើហិង្សា បង្កឧក្រិដ្ឋកម្ម ឬអសន្តិសុខជាដើម ។



តំណាងខ្មែរប៉ុស្ដិ៍នៅភាគឆ្នេរទន្លេខាងកើតនៃសហរដ្ឋអាមេរិក



ភ្ញៀវកិត្តិយសត្រូវរង្វាន់ឆ្នោត

លោក មាជ សុវណ្ណារ៉ា ចាងហ្វាងកាសែតខ្មែរប៉ុស្ដិ៍បានថ្លែងទៅកាន់អ្នកចូលរួមពិធីយ៉ាងដូច្នេះថា "សក្ដានុពលខ្មែរក្រៅស្រុកក្រៅប្រទេសមានឥទ្ធិពលខ្លាំងណាស់សំរាប់ប្រទេសកម្ពុជា ទៅថ្ងៃអនាគត គឺការកសាងប្រទេសជាតិខ្លួនតាមរយៈទ្រព្យសម្បត្តិ និងចំណេះដឹងដែលមិនខុសពីទន្លេមេគង្គដែលបាននាំដីល្បាប់មានជីវជាតិហូរកាត់ចូលមកស្រោចស្រពដល់ភោគផលធម្មជាតិខ្មែរឡើយ ។ ពោលគឺបងប្អូនជាដង្ហើមសេដ្ឋកិច្ចជួយរំលែកដល់រដ្ឋាភិបាលខ្មែរ ដោយមិនដឹងខ្លួនដែលមានទំហំដល់ទៅ 1/3នៃចំណូលថវិកាជាតិប្រមាណជាង500លានដុល្លារអាមេរិកក្នុងមួយឆ្នាំៗ ដែលបងប្អូនខ្មែរនៅក្រៅប្រទេសប្រមាណ1លាននាក់ ដែលក្នុងនោះមានបងប្អូនជាភ្ញៀវកិត្តិយសនៅចំពោះមុខក្នុងរាត្រីនេះ ដែលបានផ្ដល់លុយកាក់ជាប្រចាំខែទៅឱ្យញាតិផៅសន្ដានដើម្បីទំនុកបម្រុងពីការវេទនាអត់ឃ្លានឱ្យប្រែមកជាមានជីវភាពគ្រាន់បើមួយកម្រិតពីការអត់សម្លៀកបំពាក់ស្អាតបាត មកជាអ្នកមានសម្លៀកបំពាក់សមរម្យមានលុយអាចទុកទិញថ្នាំលេបការពារជំងឺនេះនិយាយពីស្ថានភាពសេដ្ឋកិច្ចសង្គម ។ ហើយបើនិយាយពីស្ថានការណ៍នយោបាយ ប្រសិនបើរដ្ឋាភិបាលកម្ពុជាបច្ចុប្បន្នចេះតែដឹកនាំតាមអំពើចិត្តដោយមិនគោរពច្បាប់ និងមិនដើរតាមបន្ទាត់នៃរបបលទ្ធិប្រជាធិបតេយ្យ និងការគោរពសិទ្ធិមនុស្សដោយជិះជាន់ធ្វើបាបប្រជារាស្ត្រស្លូតត្រង់ គឺគេតែងតែឃើញបងប្អូនក្រៅប្រទេសបញ្ចេញមតិតវ៉ាប្រឆាំងជាសាធារណៈ ដោយស្នើឱ្យសហគមន៍អន្តរជាតិជួយឃ្លាំមើល ឬដាក់សម្ពាធនផ្នែកយោបាយសេដ្ឋកិច្ចជួយដោះស្រាយដល់ប្រទេសកម្ពុជាដែលជាមាតុភូមិបងប្អូន ។ ដូច្នេះតម្លៃបងប្អូនមានគុណូបការៈដ៏ធំធេងណាស់សំរាប់ជាតិខ្មែរយើងដោយកុំគិតថា ទាល់តែចុះទៅស្រុកខ្មែរ ហើយចូលក្នុងគណបក្សនយោបាយ ឬចូលជាមួយរដ្ឋាភិបាល លោកនាយករដ្ឋមន្ត្រីខ្មែរ ហ៊ុន សែន ទើប បានបង្ហាញថា បងប្អូនជាអ្នកស្នេហាជាតិនោះ ។ ហើយនិយាយនេះខ្ញុំគ្មានចេតនាកម្មណាមួយ ដើម្បីបន្ទច់បង្អាក់បងប្អូនមិនឱ្យចូលខ្លួនទៅបម្រើនិន្នាការនយោបាយជាមួយគណបក្សណាមួយឡើយ ។ បើបងប្អូនលះបង់ទៅបាន គឺវារិតតែប្រសើរហើយ ។ ប៉ុន្តែការនិយាយរបស់ខ្ញុំក្នុងពេលនេះ គឺចង់បញ្ជាក់ដល់បងប្អូនមួយភាគធំដែលមិនបានទៅផ្ទាល់ ហើយតែងគិតថា មិនបានទៅជួយជាតិដោយខ្លួនឯងផ្ទាល់នោះ វាមិនប្រាកដថាត្រឹមត្រូវទេ ព្រោះថាបងប្អូនជួយលុយកាក់ឱ្យទៅញាតិសន្ដាននៅឯស្រុកនោះ នោះហើយ គឺជាការជួយជាតិរំលែកទុក្ខលំបាក និងរួមគ្នាអភិវឌ្ឍន៍កាត់បន្ថយភាពក្រីក្រមួយចំណែកធំឱ្យរដ្ឋាភិបាលកម្ពុជាផងដែរ ។ សំយោគមតិមកដែលទាំងនេះ ហើយជាមោទនភាពបងប្អូនខ្មែរដែលកើតមកជាខ្មែរត្រូវជួយខ្មែររក្សាជាតិខ្មែរឱ្យគង់វង្សរបស់ដូនតាអង្គរនៃយើងរាល់គ្នាមានតំណាងជាតិមួយរស់នៅលើលោកិយ៍នឹងគេ ។

កាសែតខ្មែរប៉ុស្ដិ៍បានកកើតឡើងនៅថ្ងៃទី 11 ខែកញ្ញា (9-11) ឆ្នាំ 2007 ហើយការចាប់ផ្ដើមបោះពុម្ពចេញផ្សាយនៅថ្ងៃទី1 ខែតុលា ឆ្នាំ2007 ដែលរហូតមកដល់ថ្ងៃនេះគឺកាសែតខ្មែរប៉ុស្ដិ៍ មានអាយុកាល2ឆ្នាំ ។ ជាកាសែតមួយពៅគេក្នុងចំណោមកាសែត ដែលមាន និងកំពុងដំណើរការដូចជា កាសែត អង្គរបូរី, សេរីភាព, ភ្នំពេញថ្មី និងខេមរាថៃម ។

តាមរយៈខ្មែរប៉ុស្ដិ៍សញ្ញាថ្មីនឹងកើតចេញបើទោះបីជាសញ្ញាថ្មី នោះនឹងមិនហ៊ីរដូចម្ទេសខ្មាំងដ៏តូចល្អិតនោះទេ ប៉ុន្តែយើងចង់ឱ្យម្ហូបនោះមានរសជាតិឆាញ់ពិសារដែលបងប្អូនជាច្រើនអាចយល់ស្របគ្នាហើយទទួលយកបានពីភាពឈ្ងុយឆ្ងាញ់នោះ ។ ដែលភាព ឈ្ងុយឆ្ងាញ់នោះ គឺផ្ដោតទៅលើព័ត៌មានស្ថិតនៅជុំវិញសហគមន៍លោក-អ្នកស្ដីពីសហគមន៍លោក-អ្នកនិងដើម្បីសេចក្ដីចម្រើនរបស់លោក-អ្នក ។ ហើយសួរថា តើត្រូវធ្វើយ៉ាងណាដើម្បីឱ្យភាពឈ្ងុយឆ្ងាញ់នោះកើតឡើងបាន ? ដែលនេះប្រាកដជាមុខជំនាញមួយដែលលោក-អ្នកនឹងឃើញទៅអនាគតថា កាសែតខ្មែរប៉ុស្ដិ៍អាចជាស្ពានសំរាប់ភ្ជាប់សហគមន៍ខ្មែរ និងអ្នកឯទៀត សម្រាប់ជាកម្លាំង និងប្រើសមត្ថភាពរៀងៗខ្លួនបាន ៕



កញ្ញា ធារ៉ា ទីប្រឹក្សាផ្នែកនយោបាយ និងកិច្ចការអន្តរជាតិរបស់កាសែតខ្មែរប៉ុស្ដិ៍




# ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ប្រែសម្រួលដោយ : ពិន សំខុន** (តពីលេខមុន)

**•••១៩ ឧសភា** : ដាក់ទូតវៀតណាមខាងត្បូងនៅកម្ពុជា , ចំណងដែលបានផ្តាច់កាលពីឆ្នាំ១៩៦៣ ។

**២០ ឧសភា** : សារព័ត៌មានចិនថ្មី " CHINE NOUVELLE" ចុះផ្សាយថា ខៀវ សំផន ដឹកនាំចលនាប្រយុទ្ធនៅបូព៌ា. ហ៊ូ នឹម ដឹកនាំនៅឧត្តរ និង ហ៊ូ យន់ នៅបច្ចិម ។

**២៦ ឧសភា** : អាមេរិកបានផ្តល់សម្ភារៈសឹកដល់រដ្ឋាភិបាល លន់ នល់ មានតម្លៃ ៧.៥ លានដុល្លារ ។

**២៧ ឧសភា** : កិច្ចព្រមព្រៀងរវាងរដ្ឋាភិបាល លន់ នល់ និងវៀតណាមខាងត្បូង ស្តីពីពលរដ្ឋស៊ីវិលរស់នៅកម្ពុជា ។

**៣០ ឧសភា** : រដ្ឋាភិបាលភ្នំពេញ ប្រកាសភាពអាសន្ន ហើយប្រើច្បាប់អាជ្ញាសឹកក្នុងរយៈពេលឥតកំណត់ ។

**ឆ្នាំ ១៩៧០** : ខែមិថុនា សាឡុតស មកពីហាណូយចូលទៅតាមខេត្តរតនគីរី ហើយតាំងទីបញ្ជាការ នៅស្រុកសន្ទុក (ខាងកើតកំពង់ធំ) ដាក់ឈ្មោះតំបន់ 31 ។

**១៧ មិថុនា** : សឹង ង៉ុកថាញ់ មកដល់ភ្នំពេញ តែងតាំងតួនាទីជាទីប្រឹក្សាជានាយករដ្ឋមន្ត្រី ។

**២៥ មិថុនា** : ចេញក្រិត្យ " កំណែនប្រជាជនទូទៅពីអាយុ ១៨ ទៅដល់ ៦០ឆ្នាំ ។

**២៧ មិថុនា** : ដកទ័ពជើងគោក ស.រ.អា ចេញពីកម្ពុជា ។

**៥ កក្កដា** : តុលាការសឹកភ្នំពេញ បានកាត់ទោសប្រហារជីវិតដល់សម្តេច សីហនុ ដោយកំបាំងមុខ ។

**២៣ កក្កដា** : លន់ លន់ សុំជំនួយយោធាពីប្រទេសថៃ ។

**៣១ កក្កដា** : យន្តហោះប្រដេញអាមេរិកាំងទម្លាក់គ្រាប់បែក ណាប៉ាម លើគីរីរម្យ និងតាមជួរភ្នំដែលបញ្ជាក់ថា ស.រ.អា បន្តចូលរួមសង្គ្រាមនៅកម្ពុជា ។

**១០ សីហា** : រណសិរ្សរំដោះ FUNK ប្រកាសថា ខ្លួនគ្រប់គ្រងដី ៥០% នៃប្រទេស ។

**១៧ សីហា** : តុលាការសឹកភ្នំពេញ កាត់ទោសអ្នកម្នាង ម៉ូនីក សីហនុ ដោយកំបាំងមុខឱ្យដាក់គុកមួយជីវិត ដោយចោទថាក្បត់ជាតិ ។

**២០ សីហា** : រៀបចំរើរដ្ឋាភិបាលថ្មី ដោយភាគច្រើនខាងពួកកុម្មុយនីស្ត ។

**.រ.រ.ជ.ក. បានប្តូរសមាសភាពនៅថ្ងៃ២០ សីហា ១៩៧០-ថ្ងៃ២៣ មីនា ១៩៧២ និងនៅថ្ងៃ៣ធ្នូ១៩៧៣ ។**

ខាងក្រោមនេះ គឺជាសមាសភាព រ.រ.ជ.ក.

. នាយករដ្ឋមន្ត្រី : ប៉ែន នុត

. ឧបនាយករដ្ឋមន្ត្រី រដ្ឋមន្ត្រីការពារជាតិ : ខៀវ សំផន

. រដ្ឋមន្ត្រីប្រតិភូអមទីស្តីការនាយករដ្ឋមន្ត្រី : គាត ឆុន

. រដ្ឋមន្ត្រីការបរទេស : សារិន ឆាក

. រដ្ឋមន្ត្រីព័ត៌មាន : ហ៊ូ នឹម

. រដ្ឋមន្ត្រីមហាផ្ទៃ : ហ៊ូ យន់

. រដ្ឋមន្ត្រីសេដ្ឋកិច្ច : ដួន ម៉ុម

. រដ្ឋមន្ត្រីបេសកម្មពិសេស: ចៅ សេង

. រដ្ឋមន្ត្រីខាងសំរបសំរួល : ជូន ប្រសិទ្ធ

. រដ្ឋមន្ត្រីអប់រំ : ខៀវ ធីរិទ្ធ

. រដ្ឋមន្ត្រីអាវុធយុទ្ធភ័ណ្ឌ : ឌួង សំអុល

. រដ្ឋមន្ត្រីយុត្តិធម៌ : នរោត្តម ភូរីស្សារ៉ា

. រដ្ឋមន្ត្រីសាធារណការ និងទូរគមនាគមន៍ : ទូច ភឿន

. រដ្ឋមន្ត្រីសុខាភិបាល : ជូន ជឿន

. រដ្ឋមន្ត្រីកិច្ចការសាសនា និងសង្គម : ជូ ជេត

**២៨ សីហា** : ទស្សនកិច្ចលោកអនុប្រធានាធិបតីអាមេរិកាំង ស្ពីរូ អាកញូ នៅកម្ពុជា ។

**១២ កញ្ញា** : អេម៉ូរី ស្វាំង ជាអគ្គរដ្ឋទូតអាមេរិកាំងទី១ ប្រចាំនៅកម្ពុជា បានមកដល់បន្ទាប់ពីផ្តាច់ទូតតាំងឆ្នាំ ១៩៦៥ មក ។

ខែកញ្ញា ១៩៧០ : បេសកម្មចិនឡាទី១ មានតួនាទីបើកផ្លូវជាតិលេខ៦ទៅកំពង់ធំ ។

**តទៅលេខក្រោយ**



# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

**(តពីលេខមុន)**



❖រូបភាព និងរឿងដើមជាភាសាថៃ ដោយ គុណាប៉ាយុតា

❖បកប្រែជាភាសាចិន ដោយភិក្ខុ ជែន ហាយ

❖បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី

❖ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី

❖បកប្រែជាភាសាខ្មែរដោយភិក្ខុ គង់ អាំ

❖Original Illuatration and Naration in Thai by Guna-payuta.

❖Translation into Chinese by Bhikkhu Jan Hai.

❖Translation into English by A Lu.

❖ Coloring by Yann Fang Lee

❖Translation into Khmer by Bhikkhu Kong Am.

**៣៧-** ដោយដឹងថា ព្រះរាជកុមារទ្រង់ព្រះតិរះយល់ការស្វែងរកនូវសច្ចធម៌ ព្រះមហាក្សត្រ សុទ្ធោទនៈទ្រង់ខ្វល់ខ្វាយព្រះទ័យយ៉ាងខ្លាំង ។ ព្រះអង្គទ្រង់បារម្ភខ្លាចក្រែងព្រះបំណងរបស់រាជបុត្របានសំរេច ហើយរាជបុត្រមុខជានឹងចាកចោលព្រះអង្គលះបង់ព្រះនគរតទៅអនាគតពិតជាមិនមានអ្នកស្នងរាជសម្បត្តិពីព្រះអង្គឡើយ ។ ព្រះអង្គបានយល់ថាមធ្យោបាយតែមួយគត់ដែលអាចញុំាងព្រះទ័យព្រះរាជបុត្រឱ្យឈប់គិតពីរឿងនោះ គឺត្រូវបន្ថែមភាពសប្បាយរីករាយដោយគ្រឿងទាក់ទាញអារម្មណ៍ផ្សេងៗដល់ព្រះអង្គ ដើម្បីឱ្យព្រះអង្គទ្រង់សព្វព្រះទ័យតែក្នុងរាជវាំងប៉ុណ្ណោះ ។ ដើម្បីឱ្យបានសំរេចព្រះបំណងនេះ គំរោងការដំបូងទ្រង់ត្រាស់បញ្ជាឱ្យជាងកសាងប្រាសាទថ្មីបីដ៏ល្អប្រណីតសំរាប់ព្រះរាជបុត្រ ។

**មានតទៅលេខក្រោយទៀត**

37- Knowing that the Prince had thought of seeking the ultimate truth, troubled King Suddhodana. He feared that if such thoughts were not eliminated, the prince probably would soon leave him and abandon the country, and then there would be no one to inherit the throne. He felt that the only way to change the prince´s mind was to double the joy and pleasure available to him in the royal palace. To achieve this end, his first plan was to construct three splendid new palaces.



*( Continued Issue After )*



# ៤ ប្រការ ជៀសវាងក្រោយពេលទទួលទានអាហាររួច

❖❖❖តាមធម្មតាក្រោយពីការទទួលអាហាររួច គេតែងតែ ចូលចិត្តលាងមាត់ ជាមួយបង្អែម ផ្លែឈើ ទឹកតែ...ឬក៏ការ ទទួលដំណេកមួយស្របក់ ។ ការងារនេះគេចាត់ទុកជារឿងធម្មតាទៅហើយ ដែលអ្នកណាក៏គេបានដឹងដែរ ប៉ុន្តែជាក់ស្តែងការធ្វើ ដូច្នេះយូរៗទៅនឹងអាចបណ្តាលឱ្យខូចសុខភាពរបស់យើងបានទៀតផង ។ បើតាមក្រុមជំនាញផ្នែកសុខភាព បានឱ្យដឹងថា ក្រោយពេលទទួលទានអាហារគួរគប្បីជៀសវាង ប៉ុន្មានប្រការខាងក្រោមនេះ

**១ ការទទួលទានផ្លែឈើភ្លាមក្រោយពីទទួលទានអាហារ**

ចំណីអាហារដែលយើងទទួលទានទៅនឹងត្រូវរក្សាទុកនៅក្នុងក្រពះប្រ-មាណ ១-២ ម៉ោង ទើបចាប់ផ្តើមរំលាយអាហារ ។ បើសិនក្រោយពេលទទួលទានអាហាររួចយើងទទួលផ្លែឈើភ្លាមទៀតនោះ វានឹងធ្វើឱ្យមានការកកស្ទះនៅក្នុងក្រពះជាមិនខានឡើយ ។ ម្យ៉ាងទៀតនៅក្នុងផ្លែឈើទាំងនោះមានផ្ទុកនូវជាតិស្ករសុទ្ធ ដូចជា ម៉ូណូសាក់សុង និងជាតិអាស៊ីដមួយចំនួន ទៀតដែលផ្សំជាមួយអាស៊ីដនៅក្នុងក្រពះបង្កើតជាអាស៊ីដថ្មីឈ្មោះ អាស៊ីដតាកាតរិច និងអាស៊ី ដទ្រិច ដែលនឹងឱ្យក្រពះយើងណែនដោយឧស្ម័នឆ្ងល់ពោះពិបាកទ្រាំទៅវិញ ។ អាស៊ីដ ដែលមាននៅក្នុងផ្លែឈើ ដែលពេញនិយមជាងគេក្រោយពីទទួលទានអាហាររួចមានដូចជា ក្រូច ក្រូចខ្វិច ទំពាំងបាយជូ សើរី ទំលាប់ជាដើម ។ ផ្លែឈើទាំងនោះមានផ្ទុកនៅសារធាតុ ផ្លាវ៉ុន ដែលធ្វើឱ្យពោះវៀនត្រូវរងការយាយីបាក់តេរីមួយចំនួនបង្កើតជាអាស៊ីដទីអ័រស៊ីណេនិច នាំឱ្យមានការចុកបរិវេនពោះវៀន ។ ដូចនេះគួរតែទុក ពេលឱ្យបាន ១-៣ ម៉ោងសិន ចាំទទួលទានផ្លែឈើតាមក្រោយ ។

**២ ជក់បារីក្រោយពេលទទួលទានបាយរួច :**

តាមអ្នកជំនាញផ្នែកសុខភាពបានឱ្យដឹងថា ក្រោយពេលទទួលទានបាយរួចឈាមនៅក្នុងខ្លួនរបស់យើងនឹងមានការកើនឡើងយ៉ាងលឿន ដូច្នេះការជក់បារីក្នុងខណៈពេលនោះវានឹងអាចបណ្តាលឱ្យយើងកើតឡើងបរិមាណស្រូបចូលជាតិពុល១០ដងបើប្រៀបនឹងថាមពលធម្មតា (គឺមួយដើមស្មើនិង ១០ដើម) ។ ម្យ៉ាងការជក់បារីក្រោយពេលបាយរួច និងធ្វើឱ្យថយចុះនូវបរិមាណទឹកប្រមាត់ទឹករំអិលប្រូតេណាល និងអាស៊ីដកាបូនិចរបស់ខួរឆ្អឹងខ្នងទៀតផង ។ ដូច្នេះការជក់បារីក្រោយពេលបាយរួច ឬក្រោយពេលបាយបន្តិច វាអាចឱ្យយើងជួបបញ្ហាចុកណែនក្រពះ ឬក៏អាចកើតមានរឿងនូវជម្ងឺរលាកក្រពះជម្ងឺស្ងួត និងស្ទះសរសៃឈាមផងដែរ ។

**៣ ងូតទឹកភ្លាមក្រោយពេលទទួលទានបាយរួច :**

នៅពេលងូតទឹក និងធ្វើឱ្យរន្ធឈាមលើស្បែករួមតូចយ៉ាងរហ័ស ប្រការនេះអាចធ្វើឱ្យការថយចុះនូវបរិមាណឈាមនៅក្នុងផ្លូវរំលាយអាហារ និងអន្តការៈខាងក្នុងទៀតផង ។ ជាពិសេសមិនត្រូវងូតទឹកត្រជាក់ ក្រោយពេលទទួលទានអាហារនោះទេ វាអាចឱ្យយើងរងនូវការគ្រុនខ្យល់ ឬផ្តាសាយបានយ៉ាងងាយបំផុត ។

**៤ ក្រោយពីទទួលទានរួចបន្ធូរខ្សែក្រវ៉ាត់ភ្លាម :**

តាមទំលាប់តំបន់នីមួយៗ គេតែងរៀចំពិធីជប់លៀងឬស៊ីផឹកដោយអង្គុយចុះលើកន្ទេល ឬពែនភ្នែនចុះជុំវិញវង់អាហារ ។ ក្រោយពីការផឹកស៊ី និងទទួលទានអាហារជាច្រើនមកគេឃើញថាមានការតឹងណែននៅដើមទ្រូងដោយមិនទាន់មានអារម្មណ៍ឆ្អែតនៅឡើយទេ ព្រោះអង្គុយនេះវាបណ្តាលឱ្យអាហារមិនធ្លាក់ចូលដល់ក្រពះ ៕




# ថែរក្សាបបូរមាត់ឱ្យស្រស់ស្អាត

•••តាមពិតទៅបបូរមាត់ គឺជាអវយវៈដែលបានទទួលផលប៉ះពាល់ពីការប្រកបការងារបំពេញភារកិច្ចក្នុងមួយថ្ងៃៗរបស់មនុស្សយើងច្រើនបំផុត ។ ហេតុដូច្នេះ ហើយដែលអ្នកត្រូវយកចិត្តទុកដាក់ថែរក្សាបបូរមាត់ជាប្រចាំ ។

អ្នកឯកទេសផ្នែកស្បែក បានណែនាំឱ្យចាប់ផ្តើមទទួលស្គាល់ពីធម្មជាតិរបស់ពណ៌បបូរមាត់ជាមុនសិន ទើបថែបំប៉នបបូរមាត់ឱ្យមើលទៅប៉ោងតឹងស្អាត ។

ពណ៌បបូរមាត់តាមធម្មជាតិអាស្រ័យទៅលើជាតិសាសន៍ និងសម្បុរស្បែក ។ អ្នកស្បែកសនឹងមានបបូរមាត់ពណ៌ជម្ពូ តែបើសម្បុរស្រគាំ បបូរមាត់ក៏ស្រគាំដែរ ដោយទៅតាមលក្ខណៈរបស់គ្រាប់ពណ៌ ។ ថ្វីបើសព្វថ្ងៃនេះអាចប្រើក្រែមធ្វើឱ្យបបូរមាត់មានពណ៌ខ្ចីឡើងបានក៏ដោយក៏វាគ្រាន់តែជារឿងបណ្តោះអាសន្នតែប៉ុណ្ណោះ នៅពេលឈប់ប្រើពណ៌បបូរមាត់ក៏ត្រឡប់មករកសភាពដូចដើមវិញ ។ ដូចនេះវិធីងាយៗដែលគួរយល់ដឹង គឺបបូរមាត់ក៏ដូចជាស្បែកផ្នែកផ្សេងៗដែលត្រូវខ្មៅស្រគាំ ព្រោះត្រូវពន្លឺថ្ងៃដូចគ្នាដែរ ថែមទាំងឆាប់ស្ងួតទៀតផង ។ ដូចនេះក្រែមថៃស្បែកបបូរមាត់ ឬ Lip-palm ជាវត្ថុចាំបាច់ក្នុង ការថែរក្សាសុខភាពស្បែក ដោយអ្នកអាចប្រើ Lip-palm លាបបានទាំងមុនពេលលាបក្រែមបបូរមាត់ ឬតាក់តែងមុខក្រោយពេលបរិភោគអាហារគ្រប់ពេល ។ល។ ការពិសារទឹកច្រើនក៏សំខាន់មិនតិចដែរ ព្រោះជូនកាល បើអ្នកស្ថិតក្នុងស្ថានភាពអាកាសធាតុ ដែលកោសិកាស្បែកមិនអាចរក្សាជាតិទឹកបានដូចជា នៅក្នុងបន្ទប់ម៉ាស៊ីនត្រជាក់កន្លែងដែលមានអាកាសធាតុស្ងួតហួតហែងសំណើមក្នុងស្បែកនឹងរំហួតចេញអស់ ។ ទង្វើលិទ្ធកេះប៉ះបបូរមាត់ជាញឹកញាប់ជាកត្តាដែលគួរចៀសវាង បើកាន់តែធ្វើច្រើនប៉ុណ្ណានោះនឹងធ្វើឱ្យមាត់ឱ្យស្ងួតខ្លាំងឡើងៗតាមនោះដែរ ។ ការបរិភោគផ្លែឈើមិនត្រឹមត្រូវតាមក្បួនក៏ធ្វើឱ្យមានផលប៉ះពាល់ បានដូចជាខាំផ្លែឈើដោយមិនបានបកសំបកជាមុនសិនធ្វើឱ្យជ័រ និងថ្នាំសម្លាប់សត្វល្អិតដែលជាប់នឹងផ្លែឈើប៉ះបបូរមាត់ឬជូនកាលបបូរមាត់ក៏អាចមានប្រតិកម្មនឹងសារធាតុខ្លះៗក្នុងក្រែមលាបបបូរមាត់ដែរ ។ ប្រសិនបើមានអាការហើមជាពងខ្ទុះថ្លាៗអាចបញ្ជាក់ពីអាការរងប្រតិកម្ម ៕

## ខ្សាច់ពណ៌...

(តមកពីទំព័រទី ០៥)

គាត់ខ្សឹបៗតិចៗ ទៅបាត់ហើយ ! ទឹកសមុទ្របានបាត់ទៅ សូម្បីទឹករលកដ៏តូចក៏គ្មាន មានតែដុំខ្សាច់មាស ឃើញពីចម្ងាយ ។ នេត្រាគាត់មើលពីចម្ងាយព្រឹមៗភ្លឹចញ្ចាច ។ ហើយលើកដៃស្ទើភ្នែក ហើយឆ្ងល់ ហើយជើងគាត់បានសន្សឹមចុះតាមជណ្តើរក្រោយដើរឃើតៗ ណាងងុយគេងផង ។ យប់នោះបាននាំ សាសុគី មកដល់ខ្សាច់មាស គាត់បាន កើបដាក់លើសំពៅ ហើយគាត់លាក់ខ្សាច់ពណ៌មាសនៅកន្លែងសម្ងាត់មួយ គាត់ត្រូវឈប់ធ្វើការជាអ្នកដាំបាយទៀតហើយ ថៅកែមានការឆ្ងល់ណាស់ ហើយបានតម្លើងប្រាក់ខែឱ្យតែ សាសុគី ឥតព្រម ។

ពេលបានខ្សាច់ពណ៌មាស គាត់បានលីទៅទាំងយប់ថ្ងៃសុក្រ វេលាម៉ោង ១១ យប់ គាត់ ដើរកាត់ខ្សាច់អស់៣យប់ ។ ពេលទៅដល់ភូមិមួយ គាត់បានជួបកូនស្រីអ្នកនេសាទត្រីម្នាក់ នៅឆ្ងាយពីក្រុងអូគីតវ៉ា នាងមានអាយុ ២៨ឆ្នាំ ប្អូនគាត់៣ឆ្នាំ គេបានស្រឡាញ់គ្នា បានយកខ្សាច់មាសទៅប្រគល់ឱ្យសារៈមន្ទីរក្រុងតូក្យូ បានលក់ឱ្យបាន ៣០០ លានយេន គេបានបើកហាងដេរម្ហូក ។ ចំនួន៥ឆ្នាំក្រោយមកបានបើករោងចក្រមានកម្មករជាង១០០នាក់ បុរសបាន ក្លាយខ្លួនជាអ្នកមានល្បីឈ្មោះក្នុងក្រុងតូក្យូ គេបានស្លាប់ក្នុងអាយុ៧៩ឆ្នាំ រីឯប្រពន្ធមានអាយុដល់៩០ទើបស្លាប់ ។ កូនបានធ្វើចម្លាក់ភ្នំដាក់ថា "ខ្សាច់ពណ៌មាស" ឯរូបឪពុកម្តាយយករូបកាលពីទើបរៀបការ អ្នកស្រុកបាននាំគ្នាទៅមើលទីនោះរាប់លានមនុស្ស ៕

# ហោរាសាស្ត្រប្រចាំ ថ្ងៃទី ១៧-៣០ តុលា



### ឆ្នាំជូត : (ពពួកទេវតាប្រុស ធាតុទឹក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ លោកអ្នកមានអារម្មណ៍ភ្លឺថ្លាគំនិតប្រាជ្ញាឈ្លាសវៃ បើបានជួបពិគ្រោះពិភាក្សាការងាររកស៊ីនឹងឆាប់និយាយត្រូវរ៉ូវ និងមានការចុះសម្រុងនឹងគ្នា ។ ចំពោះអាជីវករនឹងមានទំនិញលក់ចេញទិញចូលឥតទំនេរ ដែព្រមទាំងមានភោគផលកម្រៃហូរចូលច្រើនទៀតផង ៕



### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺរមែងតែងតែបានទទួលផលសម្រេចសមតាមបំណងប្រាថ្នាទាំងអស់ ។ ក្នុងរយៈពេលនេះ បុរសត្រូវប្រយ័ត្នចំពោះមនុស្សស្រីដែលមានសម្ដីផ្អែមត្រជាក់អាចរលាយទ្រព្យឆាប់ ។ ចំពោះគូស្នេហ៍ប្រកបតែសេចក្ដីសុខក្សេមក្សាន្ត ៕



### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ លោកអ្នកត្រូវរវៀសរវៃញាប់ជើងញាប់ដៃបន្តិច តែចូរកុំមានចិត្តលោភលន់ដោយចង់មានចង់បានឱ្យហួសប្រមាណពេក ប្រយ័ត្នបែរជាកើតរឿងរ៉ាវអាចបង់ខាតលាភសក្ការៈវិញ ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានសុភមង្គលល្អណាស់នៅក្នុងគ្រួសារ ៕



### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកច្រើន ។ ក្នុងរយៈពេលនេះ បើមានជនចម្លែកយករបស់របរមានតម្លៃមកបញ្ចាំ ឬលក់ឱ្យថូវថ្លៃយ៉ាងណាក្ដី ក៏មិនត្រូវទទួល ឬទិញយកដែរ ប្រយ័ត្ននឹងបានជាន់ដានចោរអាចោររួចខ្លួនម្ចាស់ជាប់គុក ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចប្រក្រតី ៕



### ឆ្នាំរោង : (ពពួកទេវតាប្រុស ធាតុមាស)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងឧបសគ្គច្រើន ។ ក្នុងរយៈពេលនេះ ដោយសារតែយីអ៊ុនកំពុងតែដាក់ស្រាប់នោះ ដូច្នេះលោកអ្នកមិនត្រូវហ៊ានប្រថុយប្រថានក្នុងការបណ្ដាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ប្រព្រឹត្តល្បែងស៊ីសងឡើយប្រយ័ត្នភ្លាត់ស្នៀតអាចវិនាសអន្តរាយទ្រព្យអស់រលីងពីខ្លួន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ៕



### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបរឿងរកាំរកូសច្រើន ។ ក្នុងរយៈពេលនេះបើមានរឿងជម្លោះកើតឡើង ចូរចេះអត់ធ្មត់ និងរំងាប់ចិត្តឱ្យបានត្រជាក់ដាច់ខាតមិនត្រូវតបតទាំងកំហឹងទល់នឹងកំហាល់ឡើយទើប រឿងតូចមិនអាចក្លាយជារឿងធំបាន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ៕



### ឆ្នាំមមី : (ពពួកទេវតាស្រី ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាកៗច្រើន ។ ក្នុងរយៈពេលនេះ ចូរកុំធ្វេសប្រហែសឱ្យសោះ ជាពិសេសចំពោះកម្មករសំណង់ដែលប្រកបការងារនៅតាមទីខ្ពស់ទាប ចូរប្រយ័ត្នប្រយែងក្រែងជួបគ្រោះថ្នាក់ឈានដល់ការរលត់សង្ខារទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិនត្រូវឆាប់ត្រចៀកទន់ជឿសម្ដីញុះញង់របស់អ្នកផ្សេងឡើយទើបបានសុខកាយសប្បាយចិត្ត ៕



### ឆ្នាំមមែ : (ពពួកទេវតាស្រី ធាតុមាស)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ អ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ ចូរប្រយ័ត្នប្រយែងក្រែងមានបងប្អូនញាតិមិត្តនាំរឿងក្ដៅក្រហាយមកឱ្យអាចនាំឱ្យមានអំពល់ទុក្ខដាក់ខ្លួន ព្រមទាំងអាចបង់ខាតទ្រព្យច្រើនទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានតែភាពផ្អែមល្ហែមស្និទ្ធស្នាលដូចធម្មតា ៕



### ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនលូតលាស់ទៅមុខដោយសន្សឹមៗ ។ ក្នុងរយៈពេលនេះ លោកអ្នកបានប្រកបការងារអ្វីក៏ដោយ ចូរកុំធ្វេសប្រហែសឱ្យសោះ ជាពិសេសមុនពេលចុះហត្ថលេខា ឬផ្ដិតមេដៃលើលិខិតស្នាមផ្សេងៗ ចូរពិនិត្យល្អិតល្អន់ ប្រយ័ត្នបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះ ទាល់តែចេះអត់ឱនឱ្យគ្នាទៅវិញទៅមក ទើបទទួលបានសេចក្ដីសុខ ៕



### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ អ្វីៗច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដីធ្លី ផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេងៗ ចូរធ្វើលិខិតស្នាមជាលាយល័ក្ខអក្សរដោយមានចុះហត្ថលេខា ឬផ្ដិតស្នាមមេដៃឱ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខពុំមានបញ្ហាចោទឡើង ។ ចំពោះគូស្នេហ៍មានភាពស្និទ្ធស្នាលដូចប្រក្រតី ៕



### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែមានភោគផលចំណូលហូរចូលច្រើនគួរសមក្ដី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះចាយវាយខ្ជះខ្ជាយខ្លាំងពេក ហើយក៏មិនខុសពីទូកធំក្ដោងធំនោះដែរ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ឱនឱ្យគ្នាទៅវិញទៅមកទើបមិនអាចប្រេះឆាគ្នាបាន ៕



### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះរាល់ចង្រៃឧបទ្រពបានលុកលុយចូលក្នុងកិច្ចការងាររកស៊ី ដូច្នេះទោះជាបានប្រកបការងារអ្វីក៏ដោយតែងប្រយ័ត្នប្រយែងក្រែងមានការភ្លាំងភ្លាត់អាចបង់ខាតទ្រព្យច្រើន ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចធម្មតា ៕

## (តមកពីទំព័រទី ០៤) ទ្រង់ទ្រាយនៃសម្ព័ន្ធភាពរបស់...

**១៣- សម្ព័ន្ធភាពមួយក្នុងស្រមោលនៃបក្សពីរ :**

នៅមានរូបភាពមួយទៀត ដែលគេអាចទទួលលទ្ធិប្រជាធិបតេយ្យសេរី គឺគណបក្សសម រង្ស៊ី និងគណបក្សសិទ្ធិមនុស្ស យល់ព្រមរំលាយខ្លួនក្នុងគោលការណ៍ជ្រើសរើសតំណាងរួមចេញពីមូលដ្ឋាន ដោយពលរដ្ឋនៅក្នុងមូលដ្ឋានហើយរក្សាទុកតែចរន្តនយោបាយគ្រប់គ្រងជាតិតែប៉ុណ្ណោះ ។ ក្នុងរូបភាពនេះ គេឈ្លោះប្រកែកគ្នាតែក្នុងទស្សនៈគ្រប់គ្រងប្រទេស ប៉ុន្តែពុំប្រកែកគ្នាលើគោលការណ៍ជាមូលដ្ឋាន ដែល "ពលរដ្ឋជាធំ ជាអ្នកសម្រេច " នោះទេ ។ នៅប្រទេសបារាំង មានគណបក្សជាច្រើនរួមគ្នានៅក្នុងរូបភាពជាចរន្តនយោបាយ ឆ្វេង - ស្ដាំ ឬកណ្ដាល គឺចរន្តនីមួយៗ គេសំគាល់ខ្លួនគេនៅខាងណា ហើយគេចូលរួមរំលាយខ្លួនជាបក្សតែមួយបាន ។ គឺបក្សឆ្វេង-ស្ដាំ ឬកណ្ដាលនោះហើយ ដែលប្រឈមមុខនយោបាយដាក់គ្នាដើម្បីឱ្យពលរដ្ឋបារាំងជ្រើសរើសថា បក្សណាមួយនឹងកាន់អំណាចនិតិប្រតិបត្តិនោះ ។ សម្ព័ន្ធភាពក្នុងស្រមោលបក្សពីរនេះ នឹងមានប្រសិទ្ធិភាពណាស់ ដោយចរន្តនីមួយៗ នឹងប្រកួតគ្នាជាពីរវគ្គ គឺវគ្គទី១ ប្រកួតគ្នាថា តើចរន្តណាមួយនឹងទៅដឹកនាំ ហើយវគ្គទី២ ចរន្តទាំងពីរនឹងពួតដៃគ្នាឱ្យតំណាងខ្លួនដណ្ដើមជ័យជំនះពីបក្សដទៃឯទៀត ។ យន្តការណ៍នេះ នឹងនាំឱ្យមានការអប់រំពលរដ្ឋយ៉ាងជិតស្និត ប្រស្រ័យទាក់ទងរវាងអ្នកនយោបាយ និងម្ចាស់ឆ្នោតយ៉ាងស្មើភាព ដែលជារូបភាពវិជ្ជមានសម្រាប់កម្ពុជា ។

នៅអត្ថបទទី៤ និងចុងបញ្ចប់នៅការវិភាគនៃផ្លូវបត់ដ៏សំខាន់មួយនៃនយោបាយកម្ពុជា គឺការបង្កើត " សម្ព័ន្ធភាពអ្នកប្រជាធិបតេយ្យដើម្បីផ្លាស់ប្ដូរ " ខ្ញុំចង់បង្ហាញថា : **១-** សម្ព័ន្ធភាពថ្មីនេះជាការចាំបាច់សម្រាប់ទប់ទល់រដ្ឋអំណាចដែលគ្រប់គ្រងដោយសម្លេងលើស 2/3 នៅកម្ពុជា ។ **២-** ពលរដ្ឋខ្មែររងគ្រោះគ្រប់គ្រាន់ហើយ ល្មមឱ្យមានអ្នកប្រជាធិបតេយ្យសេរីមកស្រោចស្រង់ម្ដងវិញ ។ **៣-** ដល់ពេលវែកមុខកម្ពុជា ដែលកំពុងលូនយ៉ាងស្ងៀមស្ងាត់ទៅរករណបបរទេស ។

ដោយសហគមន៍អន្តរជាតិ នៅក្នុងកម្ពុជានៅឡើយ បក្សប្រឆាំងនឹងរដ្ឋាភិបាលនៅមានលទ្ធិភាពពង្រឹងស្មារតី លទ្ធិប្រជាធិបតេយ្យសេរីបាននៅឡើយ - ដោយសារពលរដ្ឋធុញទ្រាន់នឹងការភ័យខ្លាច ធុញទ្រាន់នឹងភាពក្រីក្រ ធុញទ្រាន់នឹងភាពជាអ្នកបំរើបរទេស អ្នកទាំងនោះមានបំណងយ៉ាងជាក់ច្បាស់ថា ចង់ប្ដូរដៃអ្នកគ្រប់គ្រង ដូច្នេះ គំនិតបង្កើត " សម្ព័ន្ធភាពថ្មី " នេះប្រាកដជា មានជាមានសំណាងច្រើន ក្នុងការដណ្ដើមយក ឬបន្ថយឥទ្ធិពលអ្នកកាន់អំណាចបច្ចុប្បន្នបាន ៕

## (តមកពីទំព័រទី ០៧) ស្វែងរកការ...

គ្រូបង្ហាត់របស់យើងគឺអ្នកស្រី បាស្យា ជាគ្រូជំនួយរបស់លោកគ្រូ គ្គោអិនកា ដែលជាអ្នកផ្សព្វផ្សាយព្រះធម៌នេះធំជាងគេ ។ គាត់ជាអ្នកទទួលបច្ចេកវិជ្ជានេះ យ៉ាងជ្រៅជ្រះពីសិស្សរបស់សិស្សព្រះសមណគោត្តមដោយផ្ទាល់នៅប្រទេសភូមាកាលពីប្រមាណជាង៣០ឆ្នាំមុន ។ គាត់ជាជនជាតិឥណ្ឌាកាន់សាសនា ហិនឌូ តែមកទល់ថ្ងៃនេះ មនុស្សរាប់លានអ្នកហើយ ដែលបានស្គាល់ជម្រៅនៃព្រះពុទ្ធសាសនា ហើយគាត់ជាអ្នកនាំសាសនាព្រះពុទ្ធដែលកំពុងសាបរលាបនេះចូលទៅប្រទេសឥណ្ឌាវិញ ។ រឿងតំណាលថា ព្រះពុទ្ធសមណគោត្តមមុនចូលទិវង្គត់បានបញ្ជូនសិស្សជំនិតរបស់ព្រះអង្គទៅទីកន្លែងជាច្រើន ដើម្បីឱ្យរក្សាព្រះធម៌ក្នុងនោះមានពីរអង្គដែលត្រូវបញ្ជូនមកកាន់ប្រទេសឥណ្ឌា ដែលបានទទួលបញ្ញត្តិឱ្យធ្វើតាមវិន័យ និងក្បួនឱ្យដូចដើម ។ ពីសិស្សមួយទៅសិស្សមួយ២៥០០ឆ្នាំក្រោយមកក៏បានជួបនឹងលោក គ្គោអិនកា ក្នុងព្រឹត្តិការណ៍ដ៏ចៃដន្យមួយ ។ លោកគ្គោអិនកាជាសេដ្ឋីជាតិឥណ្ឌាមានដើមកំណើតនៅភូមាលោកជាមិត្តដ៏ជិតស្និទ្ធរបស់អតីតនាយករដ្ឋមន្ត្រីភូមាម្នាក់ដែលជាសិស្សបន្តរបស់ព្រះពុទ្ធ ។ លោក គ្គោអិនកា ជាសេដ្ឋីមែនតែមានជំងឺប្រកាំងឈឺក្បាលជាប្រចាំពេទ្យជំនាញឬពូកែប៉ុណ្ណា ក៏មើលមិនជាសះស្បើយបានឡើយ មិត្តរបស់គាត់បានស្នើថា "គួរលោកសាកល្បងនូវបច្ចេកទេសរបស់ព្រះពុទ្ធម្ដងវិញ ក្រែងអាចជួយរំដោះទុក្ខលោកបាន" លោកគ្គោ អិនកាឆ្លើយតបថា "ខ្ញុំកាន់សាសនាផ្សេង ហើយសាសនានោះពុំអនុញ្ញាតឱ្យខ្ញុំប្រណិបត្តិតាមសាសនាព្រះពុទ្ធទេ !" មិត្តរបស់លោកគ្គោអិនកាក៏ឆ្លើយតបវិញថា " ខ្ញុំពុំមានបង្រៀនសាសនាទេ ហើយខ្ញុំមិនឱ្យលោកប្ដូរសាសនារបស់លោកទេ គឺលោករៀនតែបច្ចេកទេសរបស់ព្រះពុទ្ធតែប៉ុណ្ណោះ "។ គ្មានជម្រើសផ្សេងមួយរយៈក្រោយមកលោកគ្គោអិនកា បានចូលមកប្រគល់ខ្លួនសាកល្បងវិជ្ជានេះចំនួន១០ថ្ងៃ ហើយក្នុងរយៈពេល១០ថ្ងៃនោះ ព្រះធម៌បានវះកាត់ជម្រះភាពសៅហ្មងនៅក្នុងខ្លួន និងអារម្មណ៍ ហើយក៏ក្លាយជាឱកាសដ៏ស័ក្តិសិទ្ធព្យាបាលជំងឺប្រកាំងរបស់លោក គ្គោអិនកា តែក្នុងរយៈពេល១០ថ្ងៃ ដោយគ្មានចំណាយប្រាក់អ្វីទាំងអស់ ។ ភាពស័ក្តិសិទ្ធនេះ បណ្ដាលឱ្យលោកជឿ ហើយហាត់រៀនព្រះធម៌រហូតដល់បានក្លាយទៅជាសិស្សថ្មីរបស់ព្រះពុទ្ធហើយជាគ្រូបង្ហាត់បន្តពន្លឺព្រះធម៌មកទល់ថ្ងៃនេះ ។ ៣០ឆ្នាំក្រោយមកបច្ចេកទេស "វិប្បស្សនាកម្មដ្ឋាន "នេះត្រូវបានរីកចំរើនយ៉ាងខ្លាំងនៅភូមា នៅឥណ្ឌា នៅកម្ពុជានៅថៃ ឥឡូវនេះចូលមកដល់សហរដ្ឋអាមេរិក នៅអឺរ៉ុប និងដល់អូស្ត្រាលីទៀតហើយ ។

នៅមានត

## (តមកពីទំព័រទី ០៣) អ្នកស្នេហាជាតិពិតត្រូវតែមាន...

មានស្ថាប័នរដ្ឋសភាជាតិ ស្ថាប័នរដ្ឋាភិបាល ស្ថាប័នតុលាការ វិស័យកងទ័ពជាតិ នគរបាលជាតិ វិស័យសេដ្ឋកិច្ចជាតិ និងវិស័យដទៃជាច្រើនទៀត ។ល។

នៅពេលណាគម្រោងផែនការទាំងអស់បានរៀបចំ បានសម្រេចជោគជ័យតាមគោលបំណងសព្វគ្រប់ហើយ ពេលនោះប្រទេសដែលជារបស់គ្មានព្រលឹងវិញ្ញាណ ត្រូវតែធ្លាក់ទៅនៅក្នុងកណ្ដាប់ដៃនៃម្ចាស់កម្មសិទ្ធិថ្មី ជាពិតប្រាកដ និងពេញច្បាប់ហើយ ពីព្រោះមនុស្សមានព្រលឹងវិញ្ញាណ បានបណ្ដោយឱ្យគេចូលមករៀបចំគម្រោងរបស់គេបានដោយងាយស្រួលបំផុត ។ ទោះបីជាមានមនុស្សស្នេហាជាតិពិតប្រាកដមួយក្រុមបានភ្ញាក់រលឹកក្រោកឡើង ខិតខំប្រឹងប្រែងបង្ហាត់ ពន្យល់ឱ្យជនជាតិសាសន៍របស់ខ្លួនភ្ញាក់រលឹក ហើយទាមទារហ៊ានចេញមុខប្រឆាំងនឹងមហិច្ឆតាលោភលន់ពីបរទេសយ៉ាងណាក៏ដោយ ក៏មេដឹកនាំអាយ៉ង នៅតែប្រើឥទ្ធិពលអំណាចផ្ដាច់ការរបស់ខ្លួនទៅបង្ក្រាបសកម្មជនទាំងនោះ រហូតដល់សម្លាប់ចោលអស់រាប់លាននាក់ តាំងពីក្នុងសម័យកាន់អំណាច នាឆ្នាំ ១៩៧៥ រហូតមកដល់សព្វថ្ងៃនេះ ។

គោលបំណងនៃអត្ថបទនេះ អ្នកនិពន្ធសូមជំរាបជូនប្រិយមិត្តអ្នកអានថា គោលជំហរអ្នកស្នេហាជាតិពិតប្រាកដ គ្រប់លំដាប់ថ្នាក់ តាំងពីស្ដេច ប្រធានាធិបតី នាយករដ្ឋមន្ត្រី មន្ត្រីគ្រប់ជាន់ថ្នាក់ រហូតដល់ប្រជាពលរដ្ឋសាមញ្ញ គឺត្រូវតែមានជាសារវ័នគ្រប់ៗគ្នា ទើបអាចដឹកនាំប្រទេស និងជនជាតិឱ្យបានសម្រេចជោគជ័យការពារប្រទេសជាតិឱ្យគង់វង្សជារៀងរហូតទៅបាន ។

ប៉ុន្តែ បើសិនណាជាជនជាតិខ្មែរ ដែលរស់នៅក្នុង និងក្រៅប្រទេសពុំមានគោលជំហរជាអ្នកស្នេហាជាតិពិតប្រាកដទេ ដោយគិត និងយល់ថា មេដឹកនាំប្រទេសជាតិ ត្រូវតែមានអំណាចធ្វើ និងប្រព្រឹត្តដូចម្ដេចក៏បានដែរ តាមតែទំនើងចិត្ត ចង់ប្រើប្រព័ន្ធនយោបាយដឹកនាំប្រទេសជាតិជារណបជាតិដទៃក៏បានដែរ ចង់ប្រព្រឹត្តអំពើពុករលួយក៏បានដែរ ចង់លក់ទឹកដី លក់សម្បត្តិធម្មជាតិ លក់បេតិកភ័ណ្ឌ ប្រាសាទបូរាណជាតិទៅឱ្យជាតិដទៃក៏បានដែរ មានន័យថា គោលជំហរជាអ្នកស្នេហាជាតិពិតប្រាកដនៃមេដឹកនាំ និងមន្ត្រីខ្មែរទាំងនោះ ពុំមានស្ថិតនៅក្នុងខ្លួនក្នុងចិត្តបន្តិចទាល់តែសោះ ។

អាស្រ័យហេតុនេះ ប្រជាពលរដ្ឋខ្មែរគ្រប់ស្រទាប់វណ្ណៈ និងគ្រប់មជ្ឈដ្ឋានត្រូវតែប្ដេជ្ញាសម្រេចចិត្តដកហូតមន្ត្រីរបៀបនោះចេញពីអំណាច ហើយជ្រើសរើសយកមេដឹកនាំ និងមន្ត្រីថ្មី ដែលបានចេញមុខហ៊ានប្រកាន់យកគោលជំហរជាអ្នកស្នេហាជាតិពិតប្រាកដឱ្យបានក្លាយទៅជាមេដឹកនាំ និងមន្ត្រីគ្រប់គ្រងជំនួស សម្រាប់ជួយស្រោចស្រង់ប្រទេស និងជនជាតិខ្មែរ ឱ្យរួចចេញផុតពីមហន្តរាយដ៏ធំ ៕

# ទប់ស្កាត់កុំឱ្យគេរឹបអូសយកផ្ទះ

## New England Foreclosure Prevention

**រ៉ូងអាយឡិន :**

●●●ពេលថ្មីៗនេះ ពីព្រោះតែវិបត្តិសេដ្ឋកិច្ចទីផ្សារការងារធ្លាក់ចុះ ប្រាក់ចំណូលរបស់លោកអ្នកក៏មានកាត់ធ្លាក់ចុះ ដូច្នោះមានការប៉ះពាល់យ៉ាងខ្លាំងចំពោះជីវភាពប្រចាំថ្ងៃ និងជាពិសេសនោះគឺប្រាក់បង់ថ្លៃផ្ទះ (Mortgage Payment) ។

ក្រុមមេធាវីនៃ New England Foreclosure Prevention & Home Modification អាចជួយបងប្អូនបានតាមមធ្យោបាយ និងយុទ្ធសាស្ត្រជាច្រើន ដែលអាចរក្សាផ្ទះរបស់បងប្អូនមិនឱ្យធនាគាររឹបអូស (Bank Foreclose) និងជួយធ្វើជាអ្នកតំណាងស្របច្បាប់និយាយចរចាជាមួយភាគីម្ចាស់ប្រាក់កំចី រួចហើយនឹងជួយរៀបចំសំណុំបែបបទសុំប្រាក់ជំនួយពីរដ្ឋាភិបាលសហព័ន្ធ (New Government Home Affordable Modification Program) ដើម្បីនឹងបញ្ចុះថ្លៃប្រាក់ប្រចាំខែ (Mortgage Payment) ថែមទៀតផង ។

តាំងពីថ្ងៃទី ៤ ខែមិនា ឆ្នាំ២០០៩ រដ្ឋាភិបាលរបស់លោកប្រធានាធិបតី Obama បានសុំសភាអនុម័តនូវកញ្ចប់ថវិកាពិសេសជាបីពាន់លានដុល្លារ (Tri-Billion Dillar) ដើម្បីជួយដល់អ្នកដែលគ្មានលទ្ធភាពបង់ប្រាក់ថ្លៃផ្ទះ Mortgage Payment) ។

តាមរយៈកម្មវិធី New Government Home Affordable Modification Program ក្រុមមេធាវី នៃ New England Foreclosure Provention & Home Modification អាចជួយសម្រួលជូនឱ្យបងប្អូនបង់ថ្លៃផ្ទះនៅក្នុកំរិតទាបបំផុតត្រឹមតែ ៣១% នៃប្រាក់ចំណូលប្រចាំខែតែប៉ុណ្ណោះ និងក៏អាចបញ្ចុះការប្រាក់យ៉ាងទាបរហូតដល់ត្រឹមតែ ២.៥% ទៀតផង ។

ដូច្នោះសូមអញ្ជើញ បងប្អូនខ្មែរ ដែលមានវិបត្តិថវិកាបង់ថ្លៃផ្ទះ ប្រញាប់មកទាក់ទងជាមួយនិងក្រុមមេធាវី នៅ New England ។

**សេវាភាសាខ្មែរ សូមទាក់ទង**

**សួន រដ្ឋា** : (401) 919-9954

**គូ ហ៊ីម** : (401) 837-7267 ។

ទំព័រពាណិជ្ជកម្ម

# លោកអ្នកមានជំងឺឫសដូងបាតឬ ?



ឫសដូងបាតក្នុង ? (Internal Pile) ឬឫសដូងបាតក្រៅ ? (External Pile) ជំងឺទាំងពីរនេះ គ្មានបញ្ហាទេ តែកុំទុកឱ្យយឺតពេលវានឹងអាចក្លាយជាជំងឺមហារីកលំបាកព្យាបាលណាស់ ហើយវាអាចបណ្ដាលឱ្យស្លាប់បានទៀតផង ។ បើលោកអ្នកមានរងនូវការចាប់ឈឺផ្សាអួលណែនធ្លាក់ឈាមរាំរ៉ៃនេះជាទុក្ខវេទនាយ៉ាងយូរ ។ សូមលោកអ្នកទាក់ទងនឹងខ្ញុំបាទ **គឹម ភឿន** ដែលអ្នកស្រុកក្បៀនស្វាយ បានឱ្យរហ័សនាមថា "**លោកគ្រូពេទ្យទេវតា ឬលោកគ្រូ ទេព្យឥសី** " ដោយសារខ្ញុំជួយអ្នកជម្ងឺទាំងនោះឱ្យជាសះស្បើយពីការចុកចាប់អួលផ្សាយ៉ាងសាកសិទ្ធិបំផុត ។ លោកអ្នកគ្រាន់តែប្រើថ្នាំបុរាណជប៉ុនផលិតតាមបែបសម័យទំនើប នោះអាចបានជាសះស្បើយដូចបំណង ។ ក្នុងពេលព្យាបាលអាចទៅធ្វើការធម្មតាមិនបាច់ឈប់សម្រាកអ្វីឡើយ ។ អាចជួបតាមទូរស័ព្ទពីម៉ោង ៧ ព្រឹក ដល់ម៉ោង ៦ ល្ងាច រាល់ថ្ងៃ សុក្រ សៅរ៍ អាទិត្យ ។ ពីម៉ោង ៣ ល្ងាច រាល់ថ្ងៃ ច័ន្ទ អង្គារ ពុធ ព្រហស្បត្តិ៍ ។ ខ្ញុំបាទជាគ្រូទេព្យទេវតា **គឹម ភឿន**

KIM, Phien 421 E Mentor St. Philadelphia. PA 19120
Phone : **215 680 2059**

# គណបក្សសិទ្ធិមនុស្ស

បំរើ-ការពារ-កសាង

## HUMAN RIGHTS PARTY

## ដឹកនាំដោយឯកឧត្តម កឹម សុខា

សូមអញ្ជើញលោក.លោកស្រីមើលក្នុងគេហទំព័រ www.HRPCambodia.info ដើម្បីស្ដាប់វិទ្យុ និងតាមដានព័ត៌មានទាន់សភាពការណ៍ ទាក់ទងនឹងប្រទេសកម្ពុជា ។ បើអស់លោកចង់ចូលរួម សូមទាក់ទងមក

លោក ញ៉ៃយ ចំរើន ទូរស័ព្ទ :
267-226-7861 អ៊ីម៉ែល : chamroeunkh@yahoo.com

# ឱសថស្ថានខ្មែរ

Sav-Mor PHARMACY Tel: 215-467-1220

**Sav-Mor PHARMACY**
Sam EA R.Ph.
2232 S. 7th St. (7th & Wolf) Philadelphia, Pa 19148
Tel: 215.467.1220 Fax: 215.467.1447

## បំរើលោកអ្នកដោយមិត្តភាព និងឆាន់ចិត្ត

- Sav-Mor គឺជាឱសថស្ថានបំរើ ការចែកចាយថ្នាំ ហើយអាចពន្យល់ពីរបៀបប្រើប្រាស់ថ្នាំ តាមវេជ្ជបញ្ជាជាភាសាខ្មែរបាន
- យើងទទួលយកនូវ MEDICARE MEDICAID និង INSURANCES ជាច្រើនទៀតផង យើងមានលក់កាត សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ឬទៅអន្តរជាតិ

*Accept most insurance plans including Medicare & Medicaid
*Easy Prescription transfer
*Inside. Prepaid phone card. Call Cambodia.

# NEW ASIA AMERICA TRAVEL, INC.

## Domestic & International Travel Services

| | |
|---|---|
| Serve all major airlines: | បំរើលោកអ្នកដោយក្រុមហ៊ុនអាកាសចរសំខាន់ជាច្រើន |
| Tours-cruises | រៀបចំដំណើរកំសាន្ត "ទួ" តាមនាវាចរ |
| Reentry permits/visa | លិខិតអនុញ្ញាត "រីអិនទ្រី វីហ្សា" |
| Passport photos | រូបថតដាក់លិខិតឆ្លងដែន |
| Honeymoon packages – specials | ទេសចរណ៍ស្វាមីភរិយាថ្មីថោកពិសេស |
| Single paper | |
| Special Group Tours | រៀបចំធ្វើដំណើរពិសេសជាមួយក្រុម |
| Walt Disney 4-8 days | ដំណើរទៅ "វាល់ឌីសណេ" ៤-៨ថ្ងៃ |
| Las Vagas 4-7 days | ដំណើរទៅ "ឡាសវេហ្គាស" ៤-៧ថ្ងៃ |
| California 7-10 days | ដំណើរទៅ "កាលីហ្វ័រនីញ៉ា" ៧-១០ ថ្ងៃ |
| Hawaii 6-14 days | ដំណើរទៅ "ហាវ៉ៃ" ៦-១៤ថ្ងៃ |
| Caribbean –Mexico | ដំណើរទៅ "ខារីប៊ាន-ម៉ិកស៊ិក" |
| Europe 7-21 days | ដំណើរទៅ "អឺរ៉ុប" ៧-២១ថ្ងៃ |
| Asia: China, Hong Kong, | ដំណើរទៅអាស៊ី :ចិន,ហុងកុង |
| Singapore, Malaysia, | ដំណើរទៅ សិង្ហបុរី |
| Thailand, Cambodia 10-21 days. | ដំណើរទៅប្រទេសថៃ-កម្ពុជា ១០-២១ថ្ងៃ |
| Money Transfer (Vietnam only) | ផ្ញើការផ្ញើប្រាក់ (វៀតណាមប៉ុណ្ណោះ) |
| Citizenship test | ធ្វើតេស្តសំរាប់ចូលសញ្ជាតិ |
| Pin and Pinless phone cards. | មានកាតទូរស័ព្ទ មានលេខសម្ងាត់ ឬគ្មាន |

Dung Phat Plaza Tel: (215) 468-7876
1110 Washington Ave., #6 Fax: (215) 468-7917
Philadelphia, PA 19147 E-mail: info@naatravel.com
www.newasia-americatravel.com

# សូមអញ្ជើញជួយជាវ

SUBSCRIBE TO

## កាសែតខ្មែរប៉ុស្ដិ៍

## THE KHMER POST

និងមានជូនរង្វាន់គាប់ចិត្ត

**And GET a FREE GIFT !**

- ជាវកាសែតនាពេលនេះ លោកអ្នកមានបុព្វសិទ្ធ ពិសេសគឺ
- លោកអ្នកចំណេញពេល ដោយខ្មែរប៉ុស្ដិ៍ផ្ញើមកដល់ផ្ទះតែម្ដង
- នឹងទទួលបានព័ត៌មានត្រឹមត្រូវមុនគេ ពីតំបន់លោកអ្នក ឬពីតំបន់ផ្សេងៗ ឬពីកម្ពុជា
- ទាញភ្ជាប់គម្លាតខាងភាសា និងវប្បធម៌នៅក្នុងផ្ទះ ដោយសារមានព័ត៌មានខ្មែរ និងអង់គ្លេសពីក្នុង និងក្រៅប្រទេស
- នឹងទទួលបាននូវចំណេះដឹង គំនិតថ្មី ពីការសិក្សា ពីប្រវត្តិសាស្ត្រ ពីសាសនា ពីនយោបាយ..។ល។
- នឹងទទួលបាននូវរង្វាន់ពីខ្មែរប៉ុស្ដិ៍ ដូចជា : សៀវភៅ សំរាប់រក្សាក្នុងបណ្ណាល័យ "ទីក្រុងភ្នំពេញមុនឆ្នាំ១៩៥៤"
- នឹងទទួលនូវប័ណ្ណបញ្ចុះតម្លៃផ្ញើសក់ នៅហាងសំអាតសក់ Perfect Front ទៀតផង ។

Don't Wait. Subscribe Today ! **សូមកុំរោះអញ្ជើញចុះឈ្មោះជាវថ្ងៃនេះ !**

***Please mail me my FREE Gift and the 1 year subscription of the Khmer Post***
***(24 issues for Only $5.00 per month!)***
*I would like to break the payment into these options:*
$30.00 (6 months) ____ $60.00 (1 year)

ថ្ងៃខែ. Today Date........................................
ឈ្មោះ. Name........................................
អាសយដ្ឋាន. Address........................................
អ៊ីមែល. Email Address........................................

**របៀបបង់ថ្លៃ** Payment method : ☐ Money order Check ☐

**សូមផ្ញើតម្លៃជាវមក** ***Please send your payment to :***
***US-Asia Media Group. 438 Lindley Avenue. Philadelphia, Pa 19120***

សូមផ្ញើមកឲ្យខ្ញុំនូវរង្វាន់ដែលភ្ជាប់នឹងការជាវ "ខ្មែរប៉ុស្ដិ៍" ប្រចាំឆ្នាំ (ផ្ញើ២៤លេខ ក្នុងតម្លៃតែ $5/១ខែ)
ខ្ញុំចង់ផ្ញើតម្លៃជាវកាសែតខ្មែរប៉ុស្ដិ៍ជា ...$30 (៦ខែ) ឬ ..$60.00 (១ឆ្នាំ)



សមាគមខ្មែរនៅតំបន់ហ្វីឡាដែលហ្វៀ

CAMBODIAN ASSOCIATION OF GREATER PHILADELPHIA, INC.

Honoring Our Past




Shaping Our Future

Friday, December 18, 2009
6 PM
Khmer Art Gallery
319 N 11th St
Philadelphia, PA 19107

សូមអញ្ជើញចូលរួមអបអរសាទរជាមួយយើងខ្ញុំ ពិធីគំរប់ខួបទី ៣០ របស់សមាគមខ្មែរ ។
យើងមានទទួល អាហារ និង ភេសជ្ជៈ និងការសំដែងសិល្បៈ តំលៃសំបុត្រមួយ $45
សូមទិញមុនថ្ងៃទី១១ ខែធ្នូ ។ សំរាប់ពត៌មានបន្ថែម សូមទាក់ទងមកលេខ 215-324-4070
គេហទំព័រ www.cagp.org



សមាគមខ្មែរនៅតំបន់ហ្វីឡាដែលហ្វៀ

CAMBODIAN ASSOCIATION OF GREATER PHILADELPHIA, INC.

Honoring Our Past




Shaping Our Future

Friday, December 18, 2009
6 PM
Khmer Art Gallery
319 N 11th St
Philadelphia, PA 19107

Come and celebrate CAGP 30th Year Anniversary! There will be light fare, live performances and much more. Admission is $45, RSVP by December 11.
Contact us at 215-324-4070 or log on www.cagp.org